សារព័ត៌មាន ខ្មែរប៉ុស្ត៍ ស.រ.អា

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

មាតិការរឿង Vol 07 Issue 137-Sept13th- 26th. 2013

Free



New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

# រំលឹក September 11th នៅវិទ្យាល័យឡូវែល

គោរពទង់ជាតិដែលមានឆ្លាក់ឈ្មោះវិរៈបុរសជាតិទាំង៣ពាន់នាក់ស្លាប់នៅ 9/11th



Courtesy by Jennifer Myers, Mayor's Aid

## វិចារណកថា

# សង្គ្រោះជាតិ : ហឹង្សាជាអំពើល្ងង់ខ្លៅ



ដោយ: ពិន សំខុន

គេមិនដែលឮទេ នៅកម្ពុជានាំគ្នាធ្វើបាតុកម្មអហឹង្សា! នាំគ្នាទៅបន់ស្រន់មានមហិទ្ធិរិទ្ធពីណាមកមកជួយខ្មែរបាននោះ? មានការទិទានថា "ជាមួយ ហ៊ុន សែន ដែលប្រើកម្លាំងទ័ពទល់នឹងសង្គ្រោះជាតិអង្គុយស្ងៀមស្ងាទបន់ស្រន់ នឹងធ្វើឱ្យពលរដ្ឋម្ចាស់ឆ្នោតបាក់បបខ្លួបខ្លាចកម្លាំងអាវុធជាមិនខាន!" តែភាសានេះបានភ្លេចព្រឹត្តិកាណ៍បង្កើតដោយមហាត្មៈគន្ធីនៃប្រទេសឥណ្ឌាបានទាមទារយកឯករាជ្យពីចក្រភពអងគ្លេសបាន តទៅទំព័រទី២៩

# បោះឆ្នោតនៅឡូវែលជុំទី១ថ្ងៃទី២៤ កញ្ញា ២០១៣

# Lowell Preliminary Election on September 24

*By Richard P. Howe Jr.*
*& Dr. Sengly Kong*



Richard Howe



សេងលី គង់

●●●ឈ្មោះបេក្ខជនគណក្រុមប្រឹក្សាក្រុងឡូវែលចំនួន២២នាក់បានត្រូវដាក់ឱ្យប្រជាពលរដ្ឋជ្រើសរើសនៅជុំទី១ នាថ្ងៃ២៤ កញ្ញា ខាងមុខសម្រាប់កាត់យកតែ១៨នាក់លើគេ ដើម្បីទៅឱ្យប្រជាពលរដ្ឋជ្រើសរើសយកតែ៩នាក់នៅជុំទី២ថ្ងៃទី០៥ វិច្ឆិកា ជាជុំផ្ដាច់ព្រ័ត្រ គេធ្វើរបៀបនេះ២ឆ្នាំម្ដង ។

លើកនេះមានបេក្ខជនដើមកំណើតខ្មែរ២រូប ចូលរួម គឺ វ៉ាន់ (ឌឿន) ពេជ្រ លេខ៣ និង វ៉ាស្នា នួន លេខ១២ជាសមាជិកក្រុមប្រឹក្សាចាស់ ។ អ្នកបោះឆ្នោតអាចទៅចុះឈ្មោះបោះឆ្នោតនៅសង្កាត់ចំនួន១១នៃក្រុង (Ward) ដែលចែកសង្កាត់នីមួយៗជាបីមណ្ឌល(Precint) គឺក្នុងមណ្ឌលនោះហើយដែលក្បែរលំនៅលោកអ្នកអាចទៅបោះឆ្នោតបានច្រើន និងងាយស្រួល ។ នៅលើបញ្ជីដែលស្រាវជ្រាវដោយបណ្ឌិត សេងលី គង់ យើងឃើញមានឈ្មោះអ្នកបោះឆ្នោតជាខ្មែរ ឬហោចណាស់ជាជនជាតិអាស៊ីដ៏មានចំនួនច្រើនដែលនៅមណ្ឌល ខ្លះនោះមានអ្នកចុះឈ្មោះជាខ្មែរ ឬក៏អាស៊ីរហូតដល់៤៨%បូកសរុបទៅជាង៧.០០០នាក់ ដែលជាចំនួនច្រើនឥតគណនាអាចធ្វើឱ្យខ្មែរលើស២នាក់អាចជាប់ឆ្នោតជាគណក្រុមប្រឹក្សាក្រុងឡូវែលបានឱ្យតែមានសមត្ថភាព ។ សូមអានអត្ថបទជាភាសាអង់គ្លេសរបស់ រីឆាត ហូវ និងបណ្ឌិត សេងលី គង់ ជាបន្ត:

Every two years the people of Lowell elect all nine members of the city council. Because there are 22 candidates running this year, there must be a preliminary election to reduce that number to 18. The preliminary election will be held on Tuesday, September 24 with voting places open from 7:00 a.m. until 8:00 p.m.

Here are the names of the 22 candidates in the order they will appear on the ballot on September 24. Those already serving on the council have "incumbent" after their names. Each voter may vote for up to nine candidates.

1- Doyle, Genevieve K.
2- Navom, Brandon Wynn
3- Pech, Vandoeun
4- Doyle, Frederick J.
5- Samaras, William
6- Rourke, Daniel P.
7- Milinazzo, James L.
8 -Mercier, Rita M. (incumbent)
9- Gitschier, Erik R.
10- Lorrey, Martin Marty (incumbent)
11- Hargis, Stacie
12- Nuon, Vesna (incumbent)
13- Mitchell, Derek A.
14- Belanger, Corey A.
15- Vieira, Matthew Joseph
16 Mitchell, Darius L.
17- Misitano, Rick D.
18- Kennedy Jr., Edward J. (incumbent)
19- Mendonca, Joseph M. (incumbent)
20 -Leahy, John J. (incumbent)
21- Elliott, Rodney M. (incumbent)
22 -Martin Jr., William F. (incumbent)

Even though only four candidates will be eliminated in the preliminary election on September 24, it is still important to vote since a strong finish in the preliminary election will help a candidate in the final election on November 5 when the nine city *Cotinued Page 28*




# CENTURY PHARMACY & OPTICAL

**937 Gorham St** **All MAJOR INSURANCES ACCEPTED** **Tel: 978-455-6554**

- ទទួល និងផ្ញើវេជ្ជបញ្ជាដោយឥតគិតថ្លៃ
- យកចិត្តទុកដាក់ខ្ពស់ដល់អតិថិជនគ្រប់រូប
- ទទួលគ្រប់ប័ណ្ណធានារ៉ាប់រងទាំង មេឌីឃែរ (Medicare) និងមេឌីឃេដ (Medicaid)
- អាចបង់ប្រាក់ដោយលុយសុទ្ធ, ម៉ាន់នីអ័រដឺ (Money order) ឬដោយចម្លង/ បញ្ជូនតាមទូរសារ
- អាចជួយចំណាយរួមគ្នា បើត្រូវតាមលក្ខណខណ្ឌ
- យើងមានជំនាញខាងជំងឺឆ្លង និងជំងឺរ៉ាំរ៉ៃ
- មានកញ្ចប់ពិសេសជូន

- EASY TRANSFER
- FREE PRESCRIPTION PICK UP AND DELIVERY
- Co-Pay assistance available to those who qualify
- Bill Pay, Money Orders, fax/copies
- We speak khmer




អាស័យដ្ឋាន : 937 Gorham St Lowell, MA 01852

ទូរស័ព្ទ : 978-455-6554 / ទូរសារ : 978-455-9476



# សាច់រឿងវិនាទីអាថ៌កំបាំង ឬ Moment In Time ទាក់ទាញពិភពយុវវ័យអាមេរិក



ម៉េលីសា កំពុងថតខ្សែភាពយន្ត



**អត្ថបទដោយ : សុខា**

**ក្រុងឡូវែល:** ខ្សែភាពយន្តជាច្រើននៅសហរដ្ឋអាមេរិកដែលកំពុងតែវាយលុកទីផ្សារនាពេលបច្ចុប្បន្នភាគច្រើនជាកុនបែបរន្ធត់ព្រឺព្រួច ភ័យខ្លាច តក់ស្លុត ហួសសមត្ថភាពមនុស្ស អភិនីហា របៀបខ្មោចឆៅ ឬស្លាប់ហើយតែនៅមានចលនា និងការស្រេកឃ្លានតួយ៉ាងភាពយន្តខ្មោចឆៅ វែមផាយអ៊ី(Vampire) ធូមូន ថ្វៃឡៃប្រេក យើងដនភាគមួយ និងភាគពីរ(Breaking Dawn I and II) ភាពយន្ត វ៉កឃីងដេតស៍ (Walking Death) វែមផាយអឺដើរី (Vampire Dairy) ជាដើម។ សាច់រឿងចប់ភាគមួយបន្តចូលភាគមួយទៀត ហើយទទួលបានការគាំទ្រយ៉ាងខ្លាំងពីអ្នកទស្សនា ពិសេសយុវវ័យជាមូលហេតុនាំឱ្យតួសម្តែងក្មេងៗថ្មីទាំងនោះឡើងកូដមានទីផ្សារ មានកេរ្តិ៍ឈ្មោះបោះសម្លេងដូចជាតួ អេតវើដ (Edward) បែឡា (Bella) និង ចេកុប (Jacob) ជាដើម។ នេះជាកុនបរទេសផលិត និងសម្តែងដោយបរទេស។

មិនខុសពីគ្នាដែរ វិនាទីអាថិកំបាំង ឬ Moment in Time ជាកុនថ្មីមួយដែលបញ្ចាំងនៅរោងភាពយន្តស្យូខេសក្រុងឡូវែល (Showcase in Lowell) ចាប់ពីថ្ងៃទី៦កញ្ញាតទៅរយៈពេលមួយសប្តាហ៍ជាប្រភេទកុនព្រឺព្រួចភ្ញាក់ផ្អើលលាយឡំដោយមនុស្ស និងវិញ្ញាណជារឿងអភិនីហាដូចគ្នា ប៉ុន្តែមោទនភាពមួយអំពីភាពយន្ត នេះ គឺអ្នកសម្តែង និងផលិតសុទ្ធសឹងជាកូនខ្មែរអាមេរិកាំងដែលសម្រិតសម្រាំងកសាងស្នាដៃនេះឡើង។ លោក វិបុល សង្គ្រាមជាអ្នកនិពន្ធរឿងវិនាទីអាថិកំបាំងនេះ ហើយលោក វាសនា និងលោក ធី យ៉ាន ព្រមទាំងសហនាយកប្រតិបត្តិដទៃទៀត



វិបុល



ធី យ៉ាន

ជាអ្នកសហការផលិត។ និយាយពីតួសំខាន់ គឺកញ្ញា មេលីសា អាយុ ១៧ឆ្នាំ ដើរតួ ជាលីណា ជាសិស្សវិទ្យាល័យនៅវិទ្យាល័យឡូវែល ហើយនឹងត្រូវបញ្ចប់ការសិក្សានៅឆ្នាំសិក្សា២០១៣ និង២០១៤នេះ។ មេលីសា ចាប់ផ្តើមថតកុននេះតាំងពីនាងអាយុ១៥ឆ្នាំម្ល៉េះ។ ហើយរូបសម្បត្តិក្រៅការសម្តែង ម៉េលីសា នៅជំទង់ និងវ័យក្មេងដែលគ្រប់គ្នាតែងឆ្ងល់ថា តើ ជា ម៉េលីសា មែនឬទេ ដែលសម្តែងតួឯកកុនវិនាទីអាថិកំបាំងនេះ។ ម៉េលីសា បានថ្លែងថា នាងមានសេចក្តីរំភើប និងត្រេកអរខ្លាំងនៅពេលកុនវិនាទីអាថិកំបាំងត្រូវបានយកមកបញ្ចាំងដល់សាធារណៈជនក្នុងក្រុងឡូវែលបានឃើញពីសមត្ថភាពសម្តែងរបស់កូនខ្មែរនិយាយពីរភាសាខ្មែរ និងអង់គ្លេស ។ ហើយរឿងនេះ ផ្ទាល់មិនមែនគ្រាន់តែជាការសម្តែងប៉ុណ្ណោះទេ តែវាមានអត្ថន័យបង្កប់ពីការចងភ្ជាប់នូវការឱ្យតម្លៃដល់តំបន់ឡូវែល ព្រោះទិដ្ឋភាពក្នុងរឿងទាំងមូល គឺផ្តិតនៅឡូវែលទីដែលប្រមូលផ្តុំដោយអន្តោប្រវេសន៍ និងអតីតជនភៀសខ្លួនខ្មែរដែលតស៊ូជីវិតថ្មីនៅនាយសមុទ្រនេះ។ មេលីសា បញ្ជាក់ថា នាងរីកចំរើនធំធាត់នៅឡូវែល ហើយនាងស្រឡាញ់ឡូវែល។ មេលីសា ឆ្លៀតបញ្ជាក់ប្រាប់ថា ដោយសារតែមិត្តភក្តិក្នុងសាលារបស់នាងដឹងថា នាងថតភាពយន្ត ហើយតែងតែទន្ទឹងរង់ចាំមើលស្នាដៃរបស់នាង ដូច្នេះសំណួរភាគច្រើន ដែល មេលីសា បានទទួលពីមិត្តភក្តិ គឺពេលណា ទើបកុនដែលអ្នកថតដាក់បញ្ចាំង ?

រីឯអ្នកនាង រ៉ុក សេន ជាតួមីងអមរ៉ាជាពលរដ្ឋដែលរស់នៅក្នុងក្រុងឡូវែលកំពុងសិក្សានៅសាលារដ្ឋសាឡឹមមុខជំនាញការអប់រំនៅបឋមវ័យ (Early Childhood Education)។



រ៉ុក សេន

អ្នកនាង រ៉ុក សេន មាន ទឹកចិត្តសប្បាយរីករាយពេលដែលអ្នកនាងបានរួមចំណែកថតកុនមួយនេះ ហើយអ្នកនាងបានបង្ហាញពីសារៈសំខាន់នៃកុនវិនាទីអាថិកំបាំងយ៉ាងដូច្នេះថា កុននេះកើតពីការតាំងចិត្តសហការសាមគ្គីរបស់កូនខ្មែរ ហើយចង់ឱ្យសហគមន៍ឡូវែលមើលឃើញឡូវែលក្នុងន័យវិជ្ជមាន។ មិនតែប៉ុណ្ណោះចំណុចល្អមួយទៀត ដែលអ្នកនាងទាញចេញពីកុននេះ គឺកូនខ្មែរវ័យក្មេងទាំងនោះអាចធ្វើរឿងមានប្រយោជន៍ ហើយទទួលបានកម្រៃពីការព្យាយាមថតរបស់ពួកជួយសម្រួលចំណាយឪពុកម្តាយដែលធ្វើការបីទៅបួនការងារចិញ្ចឹមកូន ហើយការបានសម្តែងកុននេះ ជាឱកាសនាំឱ្យពួកគេត្រូវបានសាធារណៈជនទទួលស្គាល់នៅពេលខាងមុខ និងជាមធ្យោបាយបើកផ្លូវពួកគេឱ្យដើរដល់ទៅចំណុចខ្ពស់នៃអាជីពនេះក៏សឹងមាន។

ត្រឹមពីរថ្ងៃនៃការបញ្ចាំងកុនវិនាទីអាថិកំបាំងនេះ មតិរបស់អ្នកទស្សនាមានការឱ្យតម្លៃខ្ពស់ដល់ភាពយន្តនេះ ដូចជា ប្អូនស្រីទិត្យទីយ៉ា ជាសិស្សវិទ្យាល័យឡូវែលបានរៀបរាប់ថា នាងឃើញផ្ទាំងពាណិជ្ជកម្មភាពយន្តវិនាទីអាថិកំបាំងនេះ នៅ ហាង សិវិនអ៊ី ឡាវិន(7/11) ហើយនាង និងម្តាយឈ្មោះ ស្រីមុំ ក៏សម្រេចចិត្តមកមើលភាពយន្តនេះ។ ក្រោយទស្សនា ទិត្យ ទីយ៉ា ពេញចិត្តភាពយន្តមួយនេះ ហើយនាងនឹងណែនាំប្រាប់មិត្តភក្តិឱ្យគាំទ្រ និងមកមើលភាពយន្តនេះ។ យ៉ាងណាមិញនាងចង់ឱ្យសាច់រឿងពន្យល់ឱ្យច្បាស់ជាងអ្វីដែលមាននៅក្នុងកុនបន្តិច ព្រោះ នាងចង់ដឹងថា ម៉េចបានជាតួប្រុស និងស្រីមានទំនាក់ទំនងគ្នា បើអ្នកទាំងពីស្ថិតនៅទីទីទៃពីគ្នា ហើយមិនដែលពាក់ព័ន្ធគ្នាមុនពេលដែលតួប្រុសស្លាប់ផង។ ត្រង់នេះនាងសង្ឃឹមថា វិនាទីអាថិកំបាំងអាចនឹងមានវគ្គពីរ ឬវគ្គបីបន្តគ្នាឱ្យ ដូចរឿងប្រេកឃីងដនភាគមួយ និងភាគពីរ (Breaking Dawn I and II) ដែលទទួលបានគាំទ្រយ៉ាងច្រើនដូច្នោះដែរ។



ស្រីមុំ ទិត្យ ទីយ៉ា

ការពណ៌នាតួអង្គដទៃដែលមានក្នុងភាពយន្តវិនាទីអាថិកំបាំងនឹងបន្តនៅលេខក្រោយ៕




ផ្ទាំងពាណិជ្ជកម្មកុនខ្មែរដំបូងបង្អស់ដែលតាំងលើស្ពានច្រកចូលក្រុងខ្មែរ

# ប្រជាជនក្រីក្រអ្នកគ្មានផ្ទះសំបែងអាចមកទទួលសេវាសុខភាពបាន តាមរយៈកម្មវិធីថ្មី (រ៉ាបអឺរ៉ោនហ្វាន់ដ៏) ឬ WRAPAROUND FUND ពីមជ្ឈមណ្ឌលសុខភាពសហគមន៍ឡូវែល

## Lowell Community Health Center (LCHC)

**អត្ថបទដោយ : សុខា**

**ក្រុងឡូវែល:** សុខភាពល្អ និងការថែទាំព្យាបាលឱ្យជាសះស្បើយពីជម្ងឺថែរក្សាអាយុជីវិតឱ្យបានយូរអង្វែង និងប្រកបដោយសុខុមាលភាព គឺជារឿងចាំបាច់បំផុតសម្រាប់មនុស្សគ្រប់រូប។ ប៉ុន្តែភាពក្រីក្រកង្វះលទ្ធភាពផ្នែកលុយកាក់ និងចំណេះដឹងព្រមទាំងក្តីបារម្ភណ៏ក្នុងការចំណាយលើថ្នាំសង្កូវ និងការព្យាបាលរោគគួបផ្សំនឹងកត្តាផ្សេងៗទៀត ជាមូលហេតុនាំឱ្យអ្នកទាំងនោះសុខចិត្តទ្រាំឈឺ ឬធ្លាក់ក្នុងស្ថានភាពគ្រោះថ្នាក់ដល់ជីវិត។

ជាក់ស្តែងក្នុងសហគមន៍ឡូវែលនៅមានប្រជាជនដែលគ្មានការងារធ្វើក្រីក្រឥតលំនៅ។ ទោះជាយ៉ាងនេះ ក្តីគ្មានហេតុផល ណាមួយដែលតម្រូវឱ្យពួកគេត្រូវទ្រាំឈឺ ឬស្លាប់ ដោយសារជម្ងឺព្រោះតែគេក្រីក្រគ្មានលុយ ឬគ្មានចំណេះដឹងឡើយ។ តាមរយៈកម្មវិធី (រ៉ាបអឺរ៉ោន ហ្វាន់ដ៏) ឬ WRAPAROUND FUND ពីមជ្ឈមណ្ឌលសុខភាពសហគមន៍ឡូវែល អ្នកទាំងអស់នោះមានសេរីភាពគ្រប់គ្រាន់មកទទួលសេវាសុខភាពការពិគ្រោះការព្យាបាលជំងឺការថែទាំសុខភាពពីមជ្ឈមណ្ឌលសហគមន៍ឡូវែល។

យ៉ាងណាមិញ (រ៉ាបអឺរ៉ោនហ្វាន់ដ៏) ឬ WRAP-AROUND FUND កំពុងប្រមូលថវិកាធ្វើយ៉ាងណាឱ្យបានទឹកប្រាក់២០ម៉ឺនដុល្លារសហរដ្ឋអាមេរិក ឬ$២០០.០០០ ដើម្បីឱ្យកម្មវិធីដំណើរការ ហើយការប្រមូលថវិកាផុតកំណត់ត្រឹមថ្ងៃទី៣០ខែកញ្ញា ឆ្នាំ២០១៣ គឺត្រឹម២សប្តាហ៍ទៀតប៉ុណ្ណោះ។ សប្បុរសជន និងសាធារណជនអាចឧបត្ថម្ភកម្មវិធី (រ៉ាបអឺរ៉ោនហ្វាន់ដ៏) ឬ WRAPAROUND FUND បានតាមបីរបៀប គឺទី១អំណោយតាមរយៈក្រេឌីតកាតក្នុងប្រព័ន្ធអិនធឺណិតនៅគេហទំព័រ www.lchealth.org /donatenow។ ទី២ ផ្ញើសែក (Check) តាមប្រអប់សំបុត្រផ្ញើមកអាស័យដ្ឋាន Lowell Community Health Center, Development Office, 161 Jackson Street, Lowell, MA 01852។ ទី៣ ទូរស័ព្ទមកកាន់លេខ៩៧៨-៧៤៦ -៧៨៦៧ ដើម្បីផ្តល់អំណោយតាមក្រេឌីតកាត(Credit Card) ឬដេប៊ីតកាត(Debit Card)។ ចំពោះទឹកប្រាក់ឧបត្ថម្ភ$៥០០ ឬច្រើនជាងនេះ នឹងទទួលបានការទទួលស្គាល់ជាពិសេសពីផ្នែកផ្គត់ផ្គង់បរិក្ខាពីមណ្ឌលសុខភាពសហគមន៍ឡូវែល។



George Nugent ,Deborah Mayerson — Soben Pin






គីមបឺលី ទុំ (Kimberly Tum, RPH) អ្នកគ្រប់គ្រងឱសថស្ថាន

ម្យ៉ាងវិញទៀត មណ្ឌលសុខភាពសហគមន៍ឡូវែលតែងមានកម្មវិធីទេសចរជុំវិញមជ្ឈមណ្ឌលរៀងរាល់មួយខែម្តងបើកជូនសាធារណជនចូលរួមដោយសេរីនៅថ្ងៃទី១៩ ខែកញ្ញា ឆ្នាំ២០១៣ ខាងមុខនេះ វេលាម៉ោង៤រសៀល ដោយជួបជុំគ្នានៅសាលទទួលភ្ញៀវជាន់ផ្ទាល់ដីនៃមជ្ឈមណ្ឌល។

គួរបញ្ជាក់ផងដែរមជ្ឈមណ្ឌលសុខភាពសហគមន៍ឡូវែលមានការទទួលស្វាគមន៍បកប្រែជា២៨ភាសាទទួលរាក់ទាក់ផ្តល់ភាពកក់ក្តៅដល់សហគមន៍ដែលប្រមូលផ្តុំដោយល្បាយជាតិសាសន៍។

រឹតតែប្រសើរជាងនេះទៀតមណ្ឌលសុខភាពឡូវែលមានឱសថស្ថានថ្មីស្រឡាងនៅជាន់ផ្ទាល់ដីក្នុងមជ្ឈមណ្ឌលផ្ទាល់ផ្តល់ភាពងាយស្រួលក្នុងការមកទទួលថ្នាំតាមវេជ្ជបញ្ជា។ ឱសថស្ថាន (Pharmacy) បើកថ្ងៃច័ន្ទដល់ពុធ ម៉ោង៨ព្រឹកដល់៨យប់ថ្ងៃព្រហស្បត្តិ៍ដល់សុក្រម៉ោង៨ព្រឹកដល់៥ល្ងាចថ្ងៃសៅរ៍ម៉ោង៨ និង៣០នាទីដល់ម៉ោង១និង៣០នាទីរសៀល និងបិទនៅថ្ងៃអាទិត្យ។

សារព័ត៌មានខ្មែរផុសរួមចំណែកក្នុងការលើកកម្ពស់សុខភាពប្រជាជនក្នុងតំបន់ឡូវែលទាំងសុខភាពផ្នែកផ្លូវចិត្ត និងផ្លូវកាយ។ ក្នុងកិច្ចសំណេះសំណាលស្វាគមន៍ដោយអគ្គនាយកផ្នែកទីផ្សារ និងគ្រប់គ្រងនៃសាពត៌មានខ្មែរផុស អ្នកស្រី សុបិន្ត ពិន ជាមួយលោក ចច ញូជិន(George Nugent) អ្នកគ្រប់គ្រងផ្នែកទំនាក់ទំនងនៃមជ្ឈមណ្ឌលសហគមន៍ឡូវែល ព្រមទាំងអ្នកស្រីដេប្រាម៉េយឺសិន (Deborah Mayerson) នាយកផ្នែកអភិវឌ្ឍន៍ និងទំនាក់ទំនងសហគមន៍ប្រព្រឹត្តទៅ កាលពីថ្ងៃពុធ ទី២៨ ខែសីហាកន្លងទៅថ្មីៗនេះ បានបង្កើតនូវទំនាក់ទំនងល្អប្រសើររវាងប្រព័ន្ធផ្សព្វផ្សាយ និងផ្នែកសុខាភិបាលសំដៅគោលដៅតែមួយ គឺប្រយោជន៍សហគមន៍ដោយសារព័ត៌មាននាំដំណឹងពីអត្ថប្រយោជន៍ទាំងឡាយដែលមណ្ឌលសុខភាពមានឱ្យប្រជាជនខ្មែរ និងសហគមន៍ទាំងមូលដឹងឮ។ ក្នុងឱកាសនោះទទ្ទឹមនឹងការចាប់អារម្មណ៍លើសុខភាពផ្លូវកាយក៏មានការលើកឡើងពីសុខភាពផ្នែកចរិយា ឬ Behavioral Health ដែលសហគមន៍ត្រូវការផងដែរ៕

**KhmerPost USA, LLC**
សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA
ផ្សាយពាណិជ្ជកម្ម Advertising
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |
អ៊ីម៉ែលsobenpin@khmerpost.us
អ្នកនិពន្ធ Editorials
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស **Contributed Writers:**
Kim Phien, Kim Sos, Mao Chan Somnom, Mam Yin,
Richard Howe Esq. Sengly Kong, Ph.D.
ច្នៃសោភ័ណភាពកាសែត **Design Artist**
Heng Chhunleng
ជំនួយការរដ្ឋបាល **Administrative Assistant**
Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# ការម៉េរ៉ាម៉ែនខ្មែរអាមេរិកកាំង ឌី ពេជ្រ DY PECH ពីកាលីហ្វូនីញ៉ាមកដល់ឡូវែល

**ដោយ : សុខា**

**ក្រុងឡូវែល:** នាឱកាសបុណ្យអុំទូកដែលទើបតែកន្លងទៅថ្មី១នេះប្រជាជនឡូវែលចាប់ផ្តើមជ្រួតជ្រាបពីទេពកោសល្យរបស់កូនខ្មែរមួយរូបដែលមានដុងក្នុងការថតរូបបង្កើតបានជាផ្ទាំងរូបថតជាច្រើនបង្ហាញម៉ូដដោយតារាម៉ូដែលខ្មែរវ័យក្មេងសុទ្ធសឹងតែជាយុវតីខ្មែរ អាមេរិកកាំង និងជានិស្សិតដែលមានឧបនិស្ស័យក្នុងការបង្ហាញម៉ូដ និងថតរូបមកពីកាលីហ្វូនីញ៉ា (California) ឡូវែល (Lowell) និងយ៉ូចចា (Gerogia)។ ក្នុងពេលដាក់តាំងបង្ហាញលក់រូបថតគេឃើញមានផ្ទាំងរូបជាច្រើនដែលមានស្ទីលថតដោយឡែកពីគ្នាមានរូបថតស្លៀក សារ៉ុងកន្ទៀតក្អម ជូតក្រម៉ា ក្នុងពណ៌ធម្មជាតិបកស្រាយពីការជ្រើសរើសឱ្យតម្លៃសម្រស់ស្ត្រីខ្មែរ។ ទន្ទឹមគ្នានោះក៏មានរូបបង្ហាញម៉ូដដោយអ្នកបង្ហាញម៉ូដដែលតែស្ថិតក្នុងឈុតប៊ីគីនី ហែលទឹករដូវក្តៅរបៀបប្រជាជនបស្ចឹមប្រទេសដែលការស្លៀកពាក់វាលបង្ហាញដងខ្លួនបែបនោះជារឿងសាមញ្ញក្នុងលោកខាងលិចនេះ។

មានមតិមកកាន់សារព័ត៌មានខ្មែរផុសលោក ឌី ពេជ្រ ថ្លែងថា ដើម្បីទទួលបានជាផ្ទាំងរូបថតដែលភ្ញៀវទាំងអស់បានឃើញ គឺត្រូវឆ្លងកាត់ការថតដែលប្រព្រឹត្តទៅពីដើមដល់ចប់ ហើយត្រូវមានការសហការរួមគ្នាពីជាងថតតារាម៉ូដែលអ្នកកាន់ភ្លើងអ្នកជ្រើសរើសទេសភាពថតអ្នក


ឌី ពេជ្រ (Dy Pich)

ឌីហ្សាញពិនិត្យកែតម្រូវពណ៌រូបថតព្រមទាំងកត្តាអំណោយផលពីធាតុអាកាស និងពេលវេលា។ មានចំណុចមួយដែលលោក ឌី ពេជ្រ គិតថា ពិបាកគឺការជ្រើសរើសទីកន្លែងថត ព្រោះត្រូវសាកសុំម្ចាស់ទីតាំង សុំសិទ្ធ សុំច្បាប់ឱ្យបានត្រឹមត្រូវជាដើម។ លោក ឌី ពេជ្រ បញ្ជាក់ថា នេះជា១ឆ្នាំដំបូងរបស់លោកនៃការកាន់កាប់របរនេះដោយខ្លួនឯង ហើយការមកដាក់ទីតាំងនៅឡូវែលក៏ជាលើកទីមួយ ។ កន្លងមកលោកធ្លាប់បំពេញការងារ


Srey C. sok



Winnaka Phann


Lindy Chann

តទៅទំព័រទី ០៩

# បាតុកម្មប្រឆាំងវត្តខ្មែរឡូវែល

**ដោយ : ពិន សំខុន**

បាតុកម្មប្រជាពលរដ្ឋក្រុងឡូវែលមួយក្រុមបានផ្ទុះឡើង កាលពីថ្ងៃទី០១ កញ្ញា កន្លងទៅចំពោះវត្តខ្មែរ ឡូវែលដែលកំពុងរៀបចំពិធីអភិសេកចំនួន១២៥០អង្គ (ដាវដោយពុទ្ធបរិ



ស័ទចំណោះជើងវត្ត) នៅ"អាល់"ក្លឹបក្បែរកន្លែង "អុំទូកខ្មែរ"។ ពុទ្ធបរិស័ទមកចូលរួមពិធីអភិសេកព្រះប្រមាណ២០០នាក់ បានឃើញក្រុមបាតុករ៦០-៧០នាក់លើកបដារប្រមាណ ២០ ផ្ទាំងទិទៀនការគ្រប់គ្រងវត្ត ថាគ្មានតម្លាភាព ហើយប្រព្រឹត្តអំពើណា ពុករលួយបាតុករសម្តែងការមិនពេញចិត្ត ចំពោះរឿងអាស្រូវដែលបានកើតឡើងក្នុងរង្វង់សមាជិកដឹកនាំរបស់វត្ត ដោយសុំឱ្យព្រះគ្រូចៅអធិការ សៅ ឃន ដោះស្រាយឱ្យបានត្រឹមត្រូវអាចទទួលយកបានទាំងអស់គ្នា សំនួរមួយទៀតថ្លែងថា "ព្រះអង្គបាន





អះអាងថា ខ្សែវីដេអូនោះមិនពិត ដូច្នេះសូមឱ្យរកអ្នកឯកទេសឯករាជ្យមកពិនិត្យ ហើយបកស្រាយឱ្យបានច្បាស់លាស់ជូនពលរដ្ឋ... ។ល ។

បាតុករដែលមកសម្តែងឆន្ទះតាមការអញ្ជើញរបស់ក្រុមប្រឹក្សាការពារវប្បធម៌ខ្មែរ បានរង់ចាំច្រើនម៉ោងពុំមានតំណាងវត្តណាម្នាក់ចេញមកជួបទេ ។ "វិបត្តិ"ដែលបានកើតពីការចែកផ្សព្វផ្សាយខ្សែវីដេអូអាសអាភាសរវាងជនស្លៀកស្បង់ម្នាក់ជាមួយនារី ដែលគេអះអាងថាមនុស្សក្នុងវត្តខ្មែរឡូវែល ពុំបានទទួលការពន្យល់ឬបកស្រាយណាមួយ ដែលមានលក្ខណៈប្រាកដនិយមគួរឱ្យជឿបាននៅឡើយទេ ។ ម្លោះហើយវិបត្តិក៏ក្លាយជាជំលោះមើលមុខគ្នាមិនបាន ។

ជួបថ្វាយបង្គំព្រះអង្គ សៅ ឃន ចៅអធិការនារសៀលថ្ងៃទី១១ កន្លងទៅនេះ ព្រះអង្គថ្លែងប្រាប់ខ្មែរផុសថា "រឿងនេះពុំមែនជារឿងអាត្មាទេ ជារឿងរបស់មេធាវីទៅហើយ ហើយគេប្រាប់អាត្មាឱ្យនៅឆ្ងាយពីរឿងនេះ ! ព្រះអង្គថ្លែងផងរៀបចំកន្លែងដាំផ្កាផងនៅលើដីផង ហើយបន្តថា "ព្រះអង្គ គិម តេង ត្រឡប់ទៅកម្ពុជាបាត់ ហើយពុំដឹងថា នឹងត្រឡប់មកវិញក៏អត់ទេ..." ។ នៅក្នុងពេលជាមួយគ្នានោះ ការពិភាក្សាគ្នាជាមួយសមាជិកជិតស្និតក្នុងវត្តព្រះអង្គ សៅ ឃន បានបង្ហាញការជឿជាក់ក្នុងព្រះទ័យថា "វត្តថ្មីនេះនឹងកើតតាមគម្រោងជាមិនខាន" ហើយនេះ គឺជាការប្តេជ្ញាព្រះទ័យរបស់ព្រះអង្គនាពេលនោះ ៕

# "តើខ្ញុំជានរណា?" កាព្យនិទាន

***ដោយៈវ៉ាន់ ទូច បកប្រែដោយ មួង ណារេត***

លោក វ៉ាន់ ទូច ជាពលរដ្ឋខ្មែរ-អាមេរិកម្នាក់រស់នៅទីក្រុងឡូវែល ។ លោកសូមចែករំលែកកាព្យនិទានមួយដូចខាងក្រោម :

ខ្ញុំបាទឈ្មោះ វ៉ាន់ ទូច ជាអ្នកអប់រំជាអ្នកនិទានរឿង ជាសកម្មជនសហគមន៍ជាស្វាមី និងជាឪពុក( ប៉ាប៉ា) របស់កូនប្រុសតូចៗពីរនាក់ឈ្មោះ វ៉ាន់ វិនស្តុន និង វ៉ាន់ ហ្វ្រែងឃ្លីន ។

ខ្ញុំមកពីប្រទេសកម្ពុជាមកសិក្សានៅសហរដ្ឋអាមេរិក នៅសាលា Middlesex Community College និងសាលា Trinity College, សកលវិទ្យាល័យ Princeton និងTufts ។ បច្ចុប្បន្ននេះ ខ្ញុំរស់នៅ និងធ្វើការនៅទីក្រុងឡូវែលរដ្ឋម៉ាសាឈូសេត ។

ខ្ញុំចូលចិត្តចំណាយពេលវេលានៅជួបជុំគ្នាជាមួយក្រុមគ្រួសារ,មិត្តភ័ក្តិខ្ញុំ និងចូលចិត្តការអានធ្វើដំណើរកំសាន្តហាត់ប្រាណដើម្បីសុខភាព ផ្លូវចិត្ត និងផ្លូវកាយ និងស្រវាចាប់យកឳកាស សិក្សាសម្រាប់គោលដៅជីវិតយូរអង្វែង ។

ខ្ញុំជាសកម្មជនសហគមន៍ដែលខ្វល់ខ្វាយអំពីបញ្ហាប៉ះពាល់ដល់សហគមន៍ ជាពិសេសសហគមន៍បងប្អូនជនជាតិខ្មែរ-អាមេរិកាំងនៅក្រុងឡូវ៉ែល ។ ខ្ញុំចាត់ទុកខ្លួនខ្ញុំថា ជាអ្នកអប់រំមួយរូបដែលតែងតែយកចិត្តទុកដាក់លើបញ្ហាដែលសហគមន៍កំពុងជួបប្រទះ និងមានមោទនភាពក្នុងការចូលរួមចំណែកអបអរសាទរស្នាដៃនានារបស់សហគមន៍ ។

ខ្ញុំជាឪពុកមួយរូបមានទម្លាប់ចូលចិត្តអួតសរសើរអំពីស្នាដៃ និងភាពឆ្ងល់ចង់ចេះចង់ដឹងរបស់កូនៗខ្ញុំ ទោះបីជាស្នាដៃ និងភាពឆ្ងល់ចង់ចេះចង់ដឹងរបស់ពួកគេនៅមិនទាន់មានលក្ខណៈឆ្គងយ៉ាងណានៅឡើយក៏ដោយ ត្បិតពួកគេទើបតែមានអាយុ១ឆ្នាំ និង៤ឆ្នាំប៉ុណ្ណោះ ។

ខ្ញុំពិតជាបុរសម្នាក់ដែលមានសំណាងដែលបានសម្រេចចិត្តត្រឹមត្រូវក្នុងការរៀបការជាមួយភរិយាខ្ញុំ ។ ធម្មតាចានក្នុងរាវរមែងប៉ះទង្គិចរណ្តំគ្នា ។ យ៉ាងណាមិញក្នុងចំណងអាពាហ៍ពិពាហ៍មានពេលខ្លះយើងល្អកល្អឺននឹងគ្នា និងពេលខ្លះទៀតយើងទាស់សម្តីគ្នាបន្តិចបន្តួច ។ ប៉ុន្តែភរិយាខ្ញុំគឺជាម្ចាស់បេះដូង និងដៃគូដ៏ស្និទ្ធស្នាលរបស់ខ្ញុំ ។

ខ្ញុំជាមនុស្សដែលចេះស្រវាឆក់យកឱកាសដែលមាន ។ ប្រសិនបើខ្ញុំឃើញថា ឱកាសនោះ ពុំមានទេ ខ្ញុំនឹងខិតខំបង្កើតឱ្យមានឱកាសនោះឡើង ។

ទោះបីជាខ្ញុំជឿជាក់លើជំនឿមុតមាំរបស់ខ្ញុំយ៉ាងណាក្តី ក៏ខ្ញុំគោរពការប្រៀនប្រដៅល្អៗរបស់សាសនាទាំងអស់នៅលើពិភពលោកមានជាអាទិ៍សាសនាព្រះពុទ្ធ អ៊ិស្លាម កាតូលិក ជ្វីហ្វ និងសាសានាដទៃទៀត ។

ខ្ញុំកំពុងរៀនអំពីរបៀបធ្វើការ និងរស់នៅជាប្រជាពលរដ្ឋល្អនៅក្នុងសហរដ្ឋអាមេរិក និងកំពុងតែរៀនឱ្យកាន់តែពូកែខាងត្រងត្រាប់ស្តាប់អ្នកដទៃ ។

ខ្ញុំគឺជាបក្សីដែលកើតមកខ្វះសម្បុក ប៉ុន្តែខ្ញុំកំពុងរៀនតស៊ូដើម្បីជីវិតមួយប្រកបដោយសេចក្តីថ្លៃថ្នូរ និងសុចរិតធម៌ និងខ្ញុំប្រកាន់យកគោលការណ៍មួយក្នុងចំណោមគោលការណ៍ចម្បងៗផ្សេងទៀតក្នុងជីវិតរបស់ខ្ញុំ គឺការចែករំលែកត្រលប់ទៅសហគមន៍វិញ ៕

# Who am I poem?




I am Tooch Van, an educator, a storyte ller, a community activist, a husband and a daddy (Papa) of two boys: Winston and Franklin Van.

I came from Cambodia to study in America at Middlesex Community College, Trinity College, Princeton and Tufts University. Now I live and work in Lowell, Massachusetts.

I like to spend time with my family/friends, reading and traveling, exercising both mind & body, as well as embracing lifelong learning opportunities.

I am a community activist who cares about issues that affect the community, particularly the Cambodian-American Community in Lowell. I consider myself to be an educator who keeps working on the issues that the community is facing and take pride in celebrating the community's accomplishments.

I am a Papa whose hobby is bragging about my sons' accomplishments & curiosities, even though their accomplishments & curiosities are not yet artistic since they are just one and four.

I am one of the lucky men who made the right decision to marry to my wife. Our married life may have highs and lows but my wife is my soul-mate.

I am one who seizes the opportunity. If I do not find an opportunity, I try to create one.

I am spiritually grounded, but am embracing good principles of all kind of religions around the world: Buddhism, Muslims and Catholicism, Judaism and others.

I am learning to work and to live rightly in the United States and am learning to be a better listener.

I am a bird who was growing up with a broken nest but am learning to strive for the dignity and integrity of life, and giving back is one of the key principles of my life.

(c) Tooch A. Van








# ទឹកប្រទាលកន្ទុយក្រពើ

## មានគុណប្រយោជន៍សម្រាប់ភ្នែក

តើអ្នកដឹងថា ការបិទភ្នែកម្ខាងដោយអាការហើមភ្នែកនិង ក្រហម ព្រមទាំងរមាស់ទៀតនោះ វាកើតឡើងដោយសារអាឡាក់ស៊ីទេមែនទេ? ដូច្នេះមុនពេលអ្នកទៅពិនិត្យជាមួយគ្រូពេទ្យអ្នកគួរសាកល្បងអនុវត្តតាមវិធីខាងក្រោមជាមុនសិន ដើម្បីឱ្យអ្នកមានអារម្មណ៍ថា ធូរស្រាល ។



**១**-ចងចាំថា ទឹកប្រទាលកន្ទុយក្រពើនឹងមិនមានផលប៉ះពាល់ដល់ភ្នែករបស់អ្នកនោះទេ ។ ដើម្បីធ្វើដូចនេះ អ្នកត្រូវការរុក្ខជាតិប្រទាលកន្ទុយក្រពើស្រស់ ។

**២**- យកកន្ត្រៃ ឬកាំបិតមកកាត់ប្រទាលនោះជា២ ឬ ៣អុីងស្មើៗគ្នា ។ បន្ទាប់មកច្បូតយកទឹកវាចំនួន២ស្លាបព្រាកាហ្វេ ។ ការកាត់បែបនេះមិនធ្វើឱ្យរុក្ខជាតិមួយនេះ ស្លាប់នោះទេ ព្រោះនោះកន្លែងកាត់នោះ វាអាចដុះឡើងវិញទៀត ។

៣-យកម្រាមដៃរបស់អ្នកជ្រលក់ទៅក្នុងទឹកនោះ បន្ទាប់មកយកទៅលាបនៅលើភ្នែកដែលឈឺនោះថ្នមៗ ។ បន្ទាប់ពីអនុវត្តតាមវិធីនេះ ហើយ អ្នកនឹងមានអារម្មណ៍ថា ធូរស្រាលភ្លាមៗ ។ អ្នកគួរតែធ្វើវា១ ឬ២ថ្ងៃមុនពេលចូលគេងនោះនៅពេលដែលអ្នកក្រោកពីដំណេកវិញភ្នែករបស់អ្នកនឹងមានភាពភ្លឺច្បាស់ ៕

# ប៉ូលីសជួបពិភាក្សានៅទីប្រជុំជនដោនថោន អំពីកំណើននៃករណីឧក្រិដ្ឋក្នុងក្រុង

ប្រែសម្រួលអត្ថបទដោយ: សុខា ពីអត្ថបទដើមដោយ: ចេនីហ្វឺ មីយឺរ ជំនួយការអភិបាលក្រុង ចេញពីគេហទំព័រផ្លូវការសាលាក្រុង Blog Name: Room 50Blog URL: http://room50.wordpress.com

**បង្ហោះនៅថ្ងៃទី២៧ សីហា ឆ្នាំ២០១៣**



ករណីឧក្រិដ្ឋកម្មកើតឡើងបន្តបន្ទាប់គ្នាក្នុងក្រុងឡូវែល។ ជាក់ស្តែងជនរងគ្រោះ ខេនី សៀន អាយុ២៥ឆ្នាំ រស់នៅក្រុង ឌ្រីខឹត ត្រូវបានជនដៃដល់បាញ់សម្លាប់។ ចំណែកឯបុរសម្នាក់ទៀតត្រូវបានគេចាក់សម្លាប់នៅផ្លូវមីដដលសិក។ ឯខាងប៉ូលីសក៏ត្រូវបានបង្កើនទ្វេជាពីរដងល្បាតតាមតំបន់មុខសញ្ញាទាំងនោះ។ នេះជាកង្វល់ក្នុងក្រុងអំពីសុវត្ថិភាព។ ភាគច្រើននៃករណីដែលបានកើតឡើងចេញមកពីការជួយថ្នាំញៀន ម៉ារីជូអេណា ឬការប្រព្រឹត្តគ្រឿងស្រវឹង និងការខឹងសម្បារឈ្លោះទាស់ទែងគ្នា។ ករណីនៃការវាយបំបែកបំផ្លាញឡាន តទៅទំព័រទី ២៤

# Downtown Meets with the Police

Posted on August 27, 2013
By Jennifer Myers, Mayor's Aid
Translated by Sokha
Courtesy by City Hall Official Blog "Room 50"


Jennifer Myers

The night 25 -year-old Keny Sien of Dracut was shot dead and another man stabbed on Middlesex Street, there were twice the number of police on duty in Downtown Lowell than on any normal Saturday night, Interim Police Superintendent Deb Friedl told more than 60 residents and business owners who attended the Lowell Downtown Neighborhood Association's Monday night meeting.

Earlier in the day, the Southeast Asian Water Festival went off without incident, bringing 15,000 people to the Vandenberg Esplanade. Lowell Police increased patrols for the festival and various after-parties not officially associated with the festival; the Massachusetts State Police were also in the city, one of whom discovered $20,000 and a cache of drugs during a routine traffic stop.

"It was a fight that began and ended in minutes," she said of the Middlesex Street violence. "This was a street fight resulting in one person stabbed and another fatally shot."

Friedl was limited to what she could say about the ongoing investigation, but did say there is no evidence that the fight was related to either Garcia Brogan's or Crown, the two bars in close proximity to the August 18 1:40 a.m. incident.

"Nothing occurred inside either establishment, neither victim had been inside either establishment," Friedl said.

The same night shots were fired on Albion Street and Continued to page 24

# ក្លូបួលវិតណោសរាយការណ៍ ពីបរិស្ថាននៅកម្ពុជា

(តពីលេខមុន)

### ៥. ជីស្រោចរ៉ែជនបទ

តំណាងរបស់ក្រុមហ៊ុន Seng Keang Company ក្នុងទីរីង សេង កុកហ៊ាង បានប្រើប្រាស់ការភ្ជាប់ទំនាក់ទំនងគ្រួសារ ការសូកសំណូក ការគម្រាមកំហែង និងសកម្មភាពហិង្សា ដើម្បីបង្កើតការគ្រប់គ្រងផ្ទាល់ខ្លួនក្នុងតំបន់នេះ ។ ប្រជាជនក្នុងតំបន់ដែលសម្ភាសន៍ដោយ Global Witness បានស្គាល់គាត់ពីដើមមកថាជា "សាច់ញាតិរបស់ ហ៊ុន សែន" ហើយមើលឃើញទំនាក់ទំនងនេះជាមួយនាយករដ្ឋមន្ត្រីថាជាប្រភពអំណាចដ៏អស្ចារ្យ[២០៨] ។កងរាជអាវុធហត្ថនិងប៉ូលីសត្រូវបានផ្តល់កម្រៃដោយការទិញអំណាច តាមរយៈការបង់ចំណាយប្រចាំខែឱ្យមន្ត្រីទាំងនោះ[២០៩] ។ ជាងនេះទៅទៀត សេង កុកហ៊ាង បានជួលជនប្រដាប់អាវុធពីម្តៃទៅសាមសិបនាក់ ភាគច្រើននៃពួកគេមកពីជួរកងយោធពលខេមរភូមិន្ទ[២១០] ។ កងជីវពលផ្ទាល់ខ្លួននេះ បានជួយគាត់មើលពួប្រឆាំងក្នុងតំបន់ និងអ្នកមកពីក្រៅដែលទៅកាន់ទីរីង[២១១] ។

### ៥.១ ការលួចកាប់ដើមច្បោះ

កិច្ចសម្ភាសន៍ជាមួយអ្នកកាប់ឈើ និងការទៅមើលតំបន់កាប់ឈើក្នុងព្រៃឡង់ បានឱ្យដឹងថា ដើមឈើទាលផ្តល់ជ័រ មានយ៉ាងហោចណាស់ ៥០% នៃឈើកែច្នៃក្នុងរោងចក្រក្រុមហ៊ុន Seng Keang Company ក្នុងភូមិខែស[២១២] ។

ដោយប្រើអស់ការផ្គត់ផ្គង់ឈើយកជ័រ និងឈើផ្សេងទៀតដែលមានក្នុងចំការ សេង កុកហ៊ាង ក៏ផ្តោតទៅលើព្រៃឈើដែលនៅជុំវិញ ។ នៅចុងឆ្នាំ ២០០៥ Global Witness បានរកឃើញក្រុមកាប់ឈើរបស់គាត់កំពុងកាប់ចម្ងាយប្រាំបីគីឡូម៉ែត្រពីបរិវេណចំការ ។ ហេតុនេះអ្នករកជ័របានបន្តបាត់បង់ដើមឈើរបស់ពួកគេ និងចំណូលដែលដើមឈើទាំងនេះបានផ្តល់ឱ្យ[២១៣] ។ អ្នកយកជ័រក្នុងភូមិទំអនៅជាយចំការបានប្រាប់ Global Witness ក្នុងឆ្នាំ ២០០៦ ថា កាលពីមុនគ្រួសារទាំង ១០០ ដែលរស់នៅទីនោះ បានកាន់កាប់ដើមច្បោះពី ២០០-៣០០ ក្នុងមួយគ្រួសារ ។ ឥឡូវនេះមានតែ ៥-៦ គ្រួសារប៉ុណ្ណោះមានដើមឈើដែលនៅសល់[២១៤] ។ក្នុងភូមិរំចេក ឃុំសុខចិត្ត អ្នកភូមិបានរាយការណ៍ពីការបាត់បង់ដើមច្បោះចំនួន ៨០០ ទៅឱ្យក្រុមកាប់ឈើរបស់ សេង កុកហ៊ាង ក្នុងតែពាក់កណ្តាលឆ្នាំ ២០០៥[២១៥] ។

ដោយយោងតាមអ្នកយកជ័រ ក្រុមហ៊ុន Seng Keang Company ពេលខ្លះនឹងបង់ឱ្យពួកគេនូវសំណងសម្រាប់ការកាប់ឈើរបស់ពួកគេ ។ ទោះយ៉ាងណាក៏ដោយ ចំនួនសរុបពាក់ព័ន្ធមានលក្ខណៈចំអកមើលងាយ – ពី US$១.២៥ - US$១២.៥ សម្រាប់ដើមឈើដែលឈើរបស់ដើមនេះ អាចលក់បានចំនួនរហូតដល់ US$១,០០០ ក្នុងក្រុងភ្នំពេញ[២១៦] ។ សេង កុកហ៊ាង និងអ្នកដែលធ្វើការឱ្យគាត់បានផ្តល់សំណងទាំងនេះតាមលក្ខណៈ "យក ឬមិនយក" ។ តាមអ្នកភូមិម្នាក់បាននិយាយថា : "លោក ៥៥ [សេង កុកហ៊ាង] មានអំណាចបំផុតពីព្រោះគាត់គម្រាមកំហែងអ្នកយកជ័រ ដោយនិយាយទៅកាន់ពួកគេថា "អញនឹងកាប់ដើមឈើរបស់ឯងទោះបីជាឯងលក់មកឱ្យអញ ឬអត់ក៏ដោយ... មានតែលោក ៥៥ ប៉ុណ្ណោះ ហ៊ាននិយាយបែបនេះ ។"[២១៧]

### ៥.២ ការដោះស្រាយជាមួយការខ្វែងយោបល់

ចាប់តាំងពីដំណាក់កាលដំបូងនៃគម្រោងចំការកៅស៊ូទីរីង ប្រជាជនក្នុងតំបន់ដែលព្យាយាមការពារព្រៃឈើ បានជួបការគម្រាមកំហែងពីអ្នកកាប់ឈើ ៕



ទាហាននៅខាងក្រៅបរិវេណក្រុមហ៊ុន Seng Keang Company ក្នុងភូមិខែស ខែវិច្ឆិកា ឆ្នាំ ២០០៥

## តមកពីទំព័រទី ៥ កាមេរ៉ាម៉ែនខ្មែរអាមេរិកាំង...

ជាអ្នកថតរូបជាមួយទូរទស្សន៍ និងក្រុមហ៊ុនដទៃទៀត។ លោក ឌី ពេជ្រ រៀបរាប់ថា ដោយសារតែមានចិត្តស្រឡាញ់វិស័យនេះ នៅពេលលោករៀននៅវិទ្យាល័យលោកផ្តើមរៀនផ្នែកថតធ្លាប់បំពេញការងារស្ម័គ្រចិត្ត ហើយបានរៀនបន្តយកសញ្ញាប័ត្រផ្នែកនេះ ពីមហាវិទ្យាល័យក្រុងឡងប៊ិច (Long Beach City College)។

បងប្អូនប្រជាជនខ្មែរភ្ញៀវជាតិ និងអន្តរជាតិអាចទទួលបាននូវសេវាកម្មដែលមាននៅ DY PECH Photography មានជាអាទិ៍ថតការការជូលតារាបង្ហាញម៉ូដដើរក្នុងពិធីលោកអ្នកការទទួលថតរូបឯកជនចំពោះអ្នកដែលចង់ថតរូបអនុស្សាវរីយ៍សម្រាប់ខ្លួនឯងជាដើម។ ជាមួយគ្នានោះ ត្បិតការចាប់ផ្តើមជាជីពនេះជាជំហានដំបូងសម្រាប់លោក និងក្រុមការងារលោកអំពាវនាវសុំឱ្យមានការគាំទ្រនូវស្នាដៃថតរូប និងសូមស្វាគមន៍យោបល់កែតម្រូវរិះគន់ ដើម្បីស្ថាបនាសំដៅលើកតម្កើងឱកាសដល់យុវតីខ្មែរអាមេរិកកាំងដែលតាំងចិត្តជ្រើសរើសវិស័យនេះ ដើម្បីឱ្យកូនខ្មែរទាំងនោះមានឱកាសបញ្ចេញសមត្ថភាពក្នុងស្ថាប័នធំៗដែលពាក់ព័ន្ធផ្នែកថតរូប និងបង្ហាញម៉ូដ។ ធ្វើដូច្នេះ ល្អសម្រាប់អនាគតពួកគេផង និងឱ្យសាធារណជនក្នុងសហរដ្ឋអាមេរិកបានស្គាល់ពីសម្រស់ស្ត្រីខ្មែរ និងខ្មែរអាមេរិកកាំងផង ៕


Lindy Chann

# លើករឿងឧក្រិដ្ឋកម្មនៅឡូវែលនារដូវក្តៅនេះ


Taya Dixon Mullane

តាយ៉ាឌីកសុនបានសរសេរឱ្យខ្មែរផុសរំលឹកពីព្រឹត្តិការណ៍ហិង្សានៅឡូវែល ដូចជាកាលពីឧសភា មានការបាញ់គ្នានៅភាគខាងជើងក្រុង-មួយអាទិត្យក្រោយមកមានការបាញ់ការផ្សេងទៀតនៅកណ្តាលក្រុងខែកក្កដា មានមនុស្សត្រូវគ្រាប់នៅហាយឡិនខាងលើ-ខែសីហាមានអ្នកដើរតាមផ្លូវត្រូវគេលបបាញ់ស្លាប់...តាយ៉ាសួរថាតើមានសហគមន៍ត្រូវធ្វើយ៉ាង? សូមអានចម្លើយជាបន្ត :

## Addressing Crime in Lowell Over the Summer

*By Taya Dixon Mullane*

Lowell has suffered from a rash of crime and violence this summer. In early May, shots were fired in the North Common in the Acre neighborhood. A week later in Centralville, there was the center of a shooting incident. One individual was shot in the Upper Highlands in July on the same night gun fire was heard in South Lowell. In late August, a man was killed on the sidewalk in Downtown. During this period, the Lowell Police Department has reported numerous car and house breaks, as well as several major drug busts.

In an effort to address crime in Lowell, the City and community partners have been working together to combat the issue. One of the most successful ways to minimize crime is to have an active and engaged community. Nearly every neighborhood in the City has an active neighborhood group that seeks to improve the quality of life for Lowell's citizens. The premise of a neighborhood group is simple: each is a volunteer group of residents and business owners who meet regularly to discuss issues affecting its neighborhood. While every neighborhood is different, all have common concerns including crime and violence in our streets.

This summer, the Lower Highlands Neighborhood Group invited the Lowell Police Department to participate in three "Sidewalk Meetings" in the neighborhood. Meeting on the sidewalks and parks in our neighborhood, residents had the opportunity to meet not only the Command Staff of the LPD but also the officers assigned to the neighborhood. On Smith Street in June, residents expressed concerns about drug trafficking. At Clemente Park, the

At the request of all of Lowell's neighborhood groups, the City Council began holding monthly Public Safety Subcommittee meetings. Rather than looking at crime as a police issue, the Public Safety Subcommittee is reviewing its policies and procedures that could be improved that can prevent crime.

# នាឡិកា សាលាក្រុង

*ប្រែសម្រួលដោយៈ សុខា ពីអត្ថបទដើម ដោយៈ ចេនីហ្វឺ មីយឺរ ជំនួយការ អភិបាលក្រុង*




ចេញពីគេហទំព័រផ្លូវការសាលាក្រុង Blog Name: Room 50Blog URL :http://room50.wordpress.com

បង្ហោះនៅថ្ងៃទី៦ កញ្ញា ២០១៣

អ្នកឃើញវាពីខាងក្រៅ។ ទុកឱ្យខ្ញុំនាំអ្នកចូលទៅខាងក្នុង។

សម្រេចបំណងនេះ ក្នុងឈុតសាមញ្ញដែលអ្នកធ្វើការពាក់នៅចុងសប្តាហ៍ គឺខោខៅប៊យ និងស្បែកជើងសង្រែកដែលងាយស្រួលពាក់។ ខ្ញុំឈោងទៅយកសោរទ្វារចុចជណ្តើរយន្តឡើងបង្ហួសទៅជាន់ ទី៤ និងតម្រង់ទៅបន្ទប់ខាងលើបង្អស់នៃអគារ(Attic)។

តើធ្វើយ៉ាងម៉េចទៅទើបខ្ញុំអាចរកឱ្យឃើញកំពូលនាឡិកាបាន? អូ... ខ្ញុំ។ ខ្ញុំក៏ចាប់ផ្តើមបន្ថយល្បឿន។ សរុបទៅជណ្តើរមាន៧១កាំ។ ខ្ញុំខំផ្ចង់តែជំហានទីមួយដែលខ្ញុំឡើងប៉ុណ្ណោះ ខ្ញុំមិនទាំងហ៊ានងាកមក្រោយទេ ព្រោះដូចជាមិនទំនងកំប្លែងឡើយ ប៉ុន្តែកិច្ចការនេះសក្តិសមនឹងការផ្សងព្រេងមួយនេះណាស់។ ទីបំផុតខ្ញុំក៏រកឃើញថា:

នាឡិកាមួយនេះ គឺ សេត្យ ថូម៉ាស ខូ ខ្លក (Seth Thomas Co. clock) ផលិតនៅក្រុង ថូម៉ាសស្តុន រដ្ឋខូនិកធិកខិត។ នាឡិកានេះជាប្រភេទនាឡិកា





ដំបូងខ្ញុំសូមប្រាប់រឿងសម្ងាត់មួយ: ៤ដងហើយ ពោលគឺស្មើនឹង៤ឆ្នាំកន្លងទៅនេះដែលខ្ញុំកំសាកចិត្តមិនដាច់មិនហ៊ានឡើងទៅឱ្យដល់កំពូលអគារសាលាក្រុង។

ថ្មីៗនេះខ្ញុំសម្រេចចិត្តយ៉ាងដាច់ស្រេច ថាខ្ញុំត្រូវតែធ្វើវា បើនៅតែបង្អែបង្អង់ខ្ញុំអាចនឹងបាត់បង់ឱកាសនេះ។ មិនខ្វល់ថា នឹងមានឧបទ្ទហេតុ ហើយក៏មិនប្រាថ្នារង្វាន់ឡើយ។ ដូច្នេះថ្ងៃនេះទុកការទទួលទានអាហារថ្ងៃត្រង់ទៅមួយឡែកសិនខ្ញុំចាប់ផ្តើមប្រតិបត្តិការ



គឺមិនពិបាកសោះឡើយ។

គ្រាន់តែដោះសោរធំ ហើយរុញទ្វារឱ្យឮសូរក្រិះ ខ្ញុំចាប់ផ្តើមឈានជើងចូលក្នុងបន្ទប់មួយដែលខ្ញុំឱ្យរហស្សនាមថា"បន្ទប់រេផិនហ្សល" ឬ"Rapunzel's Room" តែវត្តបន្ទាប...ខ្ញុំត្រូវប្រយុទ្ធនឹងឧបសគ្គមួយ គឺជណ្តើរដែកក្រវិញក្រវ៉ង់ដ៏ខ្ពស់កម្ពស់៣០ហ្វូត ហើយប៉ុំព័ទ្ធដោយធូលីក្រាស់ឃ្មឹកឈរសន្ទឹងចំពីមុខខ្ញុំ។

ពេលឡើងជណ្តើរកាណុងកាម៉េរ៉ា ម៉ាក ខេណុន បន្តោងនៅលើខ្លួនខ្ញុំវិលចុះវិលឡើងពីក្រោយខ្នង និងស្មាររបស់

ទម្ងន់ធ្ងន់មានមុំចង្អុលទៅ៤ទិស ហើយផ្លាកបញ្ជាក់អត្តសញ្ញាណនាឡិកានេះបញ្ជាក់កាលបរិច្ឆេទ ២២សីហា ឆ្នាំ១៨៩៣។ ទ្រនិចចង្អុលនាទីមានប្រវែង៨ហ្វីតទ្រនិចចង្អុលម៉ោងមានប្រវែង៤ហ្វីត។

ពេលដែលវេលារំកិលទៅមុខបន្តោងទល់មុខធ្ងន់នោះបន្ទាបចុះម្តងបន្តិចៗធ្លាក់ដល់៣០ហ្វីត តម្រង់ទៅកំពូលបន្ទប់នាឡិកា។ ហើយពេលដែលវាធ្លាក់សំយ៉ុងទាំងស្រុងហើយវាក៏វិលឡើងទៅលើសារជាថ្មី។

# City Hall Clock

**Posted on September 6, 2013**
**By Jennifer Myers, Mayor's Aid**
**Translated by Sokha**
**Courtesy by City Hall Official Blog "Room 50"**

You've seen it from the outside. Let me take you inside.

First off, full disclosure: I have chickened out four times over the last four years when presented with the opportunity to climb up into Lowell City Hall's clock tower.

Recently, I made the decision I had to do it and if I waited any longer I may never have the opportunity again. No risk, no reward. So today, instead of taking a lunch break, I, clad in "casual Friday" jeans and comfortable sneakers, grabbed the key to override the elevator, allowing it to travel to the 4th floor, and headed up to the attic.

How would I ever find the clock tower? Oh . . . that was easy.

Unlocking the Master lock and pulling open the creaky door, I stepped into what I have dubbed "Rapunzel's Room" . . . and there it was — my nemesis; the 30 foot tall spiral iron staircase, caked in a thick layer of filth, that stood between me and my dream.

Canon Rebel slung around my neck and shoulder, I began the slow, steady climb. There are 71 stairs. I tried to just look at each step and not look down, but that didn't really work. It was not a fun ascent, but it was worth it. Here is what I found:

It is a Seth Thomas Co. clock built in Thomaston, Conn. A counterweight-driven clock with four faces, its metal identification plate reads Aug. 22, 1893. The minute hands measure 8-feet long; the hour hands measure 4-feet long.

As time ticks away, the heavy counterweight slowly drops about 30 feet into the clock-tower room. When it falls all the way down, once every seven days, it needs to be cranked up again.

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំពសិទ្ធប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ច័ន្ទ ទី០៩ ខែកញ្ញា ឆ្នាំ២០១៣

# គណបក្សសង្គ្រោះជាតិនឹងបន្តធ្វើមហាបាតុកម្ម ក្រោយពីជ័យជម្នះរបស់ CPP

*ដោយ: Colin Meyn and Khuon Narim - September 9, 2013*

បន្ទាប់ពីគ.ជ.ប. បានប្រកាសកាលពីម្សិលមិញនូវលទ្ធផលផ្លូវការនៃការបោះឆ្នោតដែលបានផ្តល់ជ័យជម្នះទៅឱ្យគណបក្សប្រជាជនកម្ពុជារបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន នោះ គណបក្សសង្គ្រោះជាតិដែលជាគណបក្សប្រឆាំងបាននិយាយថា ខ្លួននឹងធ្វើពហិការមិនចូលរួមនៅក្នុងរដ្ឋសភាថ្មីទេហើយបានសន្យាបន្តធ្វើការតវ៉ា ដើម្បីទាមទារឱ្យមានការស៊ើបអង្កេតលើការបោះឆ្នោតកាលពីថ្ងៃទី២៨ ខែកក្កដានេះ។



លោក សម រង្ស៊ី ប្រធានគណបក្សសង្គ្រោះជាតិ និងលោក កឹម សុខា អនុប្រធានធ្វើសន្និសីទកាសែតមិនទទួលស្គាល់លទ្ធិផលបោះឆ្នោតជាផ្លូវការដែលប្រកាសដោយ គ.ជ.ប. កាលពីម្សិលមិញ។ គណបក្សនេះនឹងបន្តធ្វើមហាបាតុកម្មដើម្បីទាមទារឱ្យមានការបង្កើតគណៈកម្មការចម្រុះឯករាជ្យមួយ ។(ស៊ីវ ចាន់ណា)

លទ្ធផលបោះឆ្នោតដែលមិនអាចតវ៉ាបានទៀតនេះបានប្រគល់អាសនៈសភាចំនួន៦៨ទៅឱ្យគណបក្សប្រជាជនកម្ពុជា និង៥៥អាសនៈទៅឱ្យគណបក្សសង្គ្រោះជាតិ គឺដូចគ្នាទៅនឹងការបែងចែកអាសនៈដែលលោក ខៀវ កាញារីទ្ធ រដ្ឋមន្ត្រីក្រសួងព័ត៌មានមកពីគណបក្សប្រជាជនកម្ពុជាបានប្រកាសនៅល្ងាចនៃថ្ងៃបោះឆ្នោតនោះ។

មេដឹកនាំគណបក្សសង្គ្រោះជាតិដែលបានបញ្ចុះបញ្ចូលអស់រយៈពេលប្រាំសប្តាហ៍មកហើយឱ្យពន្យារពេលការប្រកាសលទ្ធផលបោះឆ្នោតផ្លូវការរហូតដល់មានការស៊ើបអង្កេតដោយឯករាជ្យលើភាពមិនប្រក្រតីដែលត្រូវបានចោទឡើងនោះបានធ្វើសន្និសីទកាសែតកាលពីព្រឹកម្សិលមិញ ដើម្បីបដិសេធលទ្ធផលនៃការបោះឆ្នោតនេះ។

លោក សម រង្ស៊ី ប្រធានគណបក្សសង្គ្រោះជាតិបានមានប្រសាសន៍នៅឯសន្និសីទកាសែតនោះថា "យើងនឹងបន្តការតវ៉ា ដើម្បីរកការពិត។ ជាពិសេសយើងនឹងផ្តោតលើការធ្វើបាតុកម្មដើម្បីទាមទារឱ្យមានការបង្កើតគណៈកម្មការចម្រុះឯករាជ្យមួយ ដើម្បីស្វែងរកការពិត និងយុត្តិធម៌ជូនអ្នកបោះឆ្នោត"។

លោក សម រង្ស៊ី រួមជាមួយនឹងលោក កឹមសុខា ដែលជាអនុប្រធានរបស់លោកបានសន្យាធ្វើបាតុកម្មយ៉ាងហោចណាស់បីថ្ងៃនៅក្នុងទីក្រុងភ្នំពេញដែលនឹងចាប់ផ្តើមនៅថ្ងៃទី១៥ ខែកញ្ញា ដើម្បីជំរុញឱ្យគណបក្សប្រជាជនកម្ពុជាសហការក្នុងការស៊ើបអង្កេតលើការបោះឆ្នោតនេះ។

លោកបានមានប្រសាសន៍ថា "យើងនឹងធ្វើបាតុកម្មជាបន្តបន្ទាប់។ បាតុកម្មនោះយ៉ាងហោចណាស់មានរយៈពេលបីថ្ងៃ ប៉ុន្តែវាអាចមានរយៈពេលយូរជាងនេះ"។ លោកបានបន្ថែមថា ការធ្វើបាតុកម្មនោះនឹងធំជាងការជួបជុំគ្នាកាលពីថ្ងៃសៅរ៍ ដែលមានអ្នកគាំទ្រចូលរួមប្រហែល២០.០០០នាក់នៅសួនសេរីភាព។ លោក សម រង្ស៊ី បានមានប្រសាសន៍ថា "បាតុកម្មនោះអាចមានទម្រង់ផ្សេងៗ ដូចជាទម្រង់នៃការជួបជុំទម្រង់នៃការធ្វើបាតុកម្មអង្គុយមួយកន្លែង ឬទម្រង់នៃការហែរក្បួន"។ លោកបានឱ្យដឹងទៀតថា ព័ត៌មានលម្អិតនៃការធ្វើបាតុកម្មនេះនឹងត្រូវកំណត់នៅសប្តាហ៍ក្រោយនេះ។

គណបក្សប្រជាជនកម្ពុជាបានចេញសេចក្តីថ្លែងការណ៍ផ្ទាល់ខ្លួនមួយកាលពីម្សិលមិញ ដែលនៅក្នុងនោះគណបក្សនេះបានលើកឡើងថា ការបោះឆ្នោតនេះ តទៅទំព័រទី១៣

# Opposition Promises More Protests as CPP Election Win Confirmed

*By Phorn Bopha and Khuon Narim - September 8, 2013*

After the National Election Committee (NEC) announced final election results Sunday morning ratifying victory for Prime Minister Hun Sen's CPP in the July 28 national election, the Cambodia National Rescue Party announced that it would hold several days of demonstrations, beginning September 15.

CNRP leaders Sam Rainsy and Kem Sokha announced the planned demonstrations at a press conference at party headquarters in Phnom Penh on Sunday afternoon.

CNRP vice president Kem Sokha, right, speaks at a press conference with party president Sam Rainsy at the opposition party headquarters in Phnom Penh on Sunday afternoon. (Siv Channa)

CNRP vice president Kem Sokha, right, speaks at a press conference with party president Sam Rainsy at the opposition party headquarters in Phnom Penh on Sunday afternoon. (Siv Channa)

"There will be a series of demonstrations," Mr. Rainsy said.

"They will be larger [than Saturday's opposition rally, which drew about 20,000 people], because we will mobilize people who are not happy with the results released by the NEC this morning," he said.

"It will last for at least three days, but it could last longer. It could take a variety of forms, the form of a meeting, the form of a sit-in or the form of marches," Mr. Rainsy said, adding that specifics about the demonstrations would be determined over the coming week.

The NEC announced the final election results on national TV and radio, confirming that Mr. Hun Sen's CPP won 68 National Assembly seats to 55 for the CNRP.

The results are identical to those that were announced by CPP Information Minister Khieu Kanharith on the evening of the July 28 vote.

In the weeks following the election, the NEC, which claimed there was a lack of evidence, dismissed dozens of complaints issued by the CNRP over alleged election irregularities.

The Constitutional Council of Cambodia on Friday wrapped up its review of the disputed results saying that none of the CNRP's complaints merited a wider investigation, though it did order the NEC to seek punitive action against local election officials responsible for minor irregularities.

# ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ច័ន្ទ ទី០៩ ខែកញ្ញា ឆ្នាំ២០១៣

តមកពីទំព័រទី ១២

## គណបក្សសង្គ្រោះជាតិនឹងបន្តធ្វើ...

"សេរី ត្រឹមត្រូវយុត្តិធមិ ហើយស្របតាមរដ្ឋធម្មនុញ្ញនៃព្រះរាជាណាចក្រកម្ពុជា និងលទ្ធិប្រជាធិបតេយ្យ" ហើយបានសន្យាធ្វើកំណែទម្រង់ប្រកបដោយមហិច្ឆតាជាច្រើនអំឡុងពេលខ្លួនកាន់អំណាចរយៈពេលប្រាំឆ្នាំខាងមុខនេះ។

សេចក្តីថ្លែងការណ៍នោះលើកឡើងថា "នៅឱកាសនេះគណបក្សប្រជាជនកម្ពុជាសូមប្រកាសជាឱឡារិកទទួលស្គាល់លទ្ធផលនៃការបោះឆ្នោតទូទៅអាណត្តិទី៥ កាលពីថ្ងៃទី២៨ ខែកក្កដា ឆ្នាំ២០១៣ នេះ និងសន្យាការពារលទ្ធផលបោះឆ្នោតដែលចេញពីឆន្ទៈរបស់ប្រជាជននេះ"។

គណបក្សនេះបន្តលើកឡើងទៀតថា "គណបក្សប្រជាជនកម្ពុជានឹងធ្វើការកែទម្រង់ឱ្យបានស៊ីជម្រៅ ដំឡើងប្រាក់ខែមន្ត្រីរាជការ និងកងកម្លាំងប្រដាប់អាវុធ ព្រមទាំងកម្មករ និងលើកកម្ពស់ជីវភាព និងសុខុមាលភាពរបស់ប្រជាជន ជាពិសេសប្រជាជនក្រីក្រដែលកំពុងរស់នៅក្នុងស្ថានភាពលំបាក"។

គណបក្សសង្គ្រោះជាតិក៏បានចេញសេចក្តី?ថ្លែងការណ៍មួយដែរ កាលពីម្សិលមិញដែលបានលើកឡើងសារជាថ្មីនូវការគំរាមមិនចូលរដ្ឋសភា ប្រសិនបើគណបក្សប្រជាជនកម្ពុជាមានបំណងបង្កើតរដ្ឋាភិបាលភ្លាមៗនោះ។

លោក សម រង្ស៊ី បានមានប្រសាសន៍នៅឯសន្និសីទកាសែតកាលពីម្សិលមិញថា "យើងបានឮថា គណបក្សប្រជាជនកម្ពុជាគំរាមថា ប្រសិនបើគណបក្សសង្គ្រោះជាតិមិនចូលរួមក្នុងរដ្ឋសភាអាណត្តិទី៥នេះទេ ពួកគេនឹងយកអាសនៈរបស់យើងទៅបែងចែកនៅក្នុងគណបក្សរបស់ពួកគេ"។

លោកបានមានប្រសាសន៍ថា "ប្រសិនបើពួកគេធ្វើដូច្នេះមែន វាបង្ហាញយ៉ាងច្បាស់ថាប្រទេសកម្ពុជាបានវិលទៅរករបបកុម្មុយនីស្ត និងប្រព័ន្ធដែលមានបក្សតែមួយវិញហើយ"។ លោកបានបន្ថែមថា គណបក្សប្រជាជនកម្ពុជាត្រូវប្រកាន់ខ្ជាប់ទៅនឹងគោលការណ៍លទ្ធិប្រជាធិបតេយ្យដែលមានចែងក្នុងកិច្ចព្រមព្រៀងសន្តិភាពទីក្រុងប៉ារីសឆ្នាំ១៩៩១។

លោក ហ៊ុន សែន បានថ្លែងកាលពីថ្ងៃទី២ ខែសីហាថា គណបក្សរបស់លោកអាចទទួលបានអាសនៈ៥៥របស់គណបក្សសង្គ្រោះជាតិដោយស្របច្បាប់ ប្រសិនបើពួកគេមិនចូលរួមក្នុងសភាថ្មីទេ។ ការបកស្រាយរបស់លោកលើច្បាប់នេះមានការជំទាស់ជាច្រើន។

លោក គល់ បញ្ញា នាយកប្រតិបត្តិគណៈកម្មាធិការដើម្បីការបោះឆ្នោតដោយសេរី និងយុត្តិធមិនៅកម្ពុជាបានមានប្រសាសន៍ថា គណបក្សសង្គ្រោះជាតិកំពុងប្រើប្រាស់បាតុកម្មជាមធ្យោបាយមួយក្នុងចំណោមមធ្យោបាយដែលមានឥទ្ធិពលជាច្រើនដើម្បីគាបសង្កត់គណបក្សប្រជាជនកម្ពុជាដែលរហូតមកទល់ពេលនេះធ្វើមិនដឹងមិនឮចំពោះការទាមទាររបស់គណបក្សប្រឆាំងនៅក្រោយពេលបោះឆ្នោត។

លោក គល់ បញ្ញា បានមានប្រសាសន៍ថា "គណបក្សប្រជាជនកម្ពុជាចង់បង្កើតរដ្ឋាភិបាលឱ្យបានឆាប់តាមដែលអាចធ្វើទៅបាន" ហើយគណបក្សកាន់អំណាចនេះត្រូវប្រកាន់ខ្ជាប់ទៅនឹងសេណារីយ៉ូផ្សេងគ្នាពីសេណារីយ៉ូក្រោយការបោះឆ្នោតឆ្នាំ២០០៨ ដែលនៅក្នុងនោះគណបក្សនេះទទួលបានចំនួន៩០អាសនៈ។

លោកបានមានប្រសាសន៍ថា "គណបក្សប្រជាជនកម្ពុជាគួរផ្លាស់ប្តូរឥរិយាបថរបស់ខ្លួន។ បើមិនដូច្នេះទេខ្ញុំបារម្ភអំពីវិបត្តិនយោបាយរយៈពេលយូរ។ គណបក្សប្រឆាំងពិបាកប្រមូលមនុស្សឱ្យបាន១០.០០០នាក់ណាស់នៅក្នុងអាណត្តិមុន ប៉ុន្តែឥឡូវនេះវាងាយស្រួលសម្រាប់គណបក្សសង្គ្រោះជាតិ។ គណបក្សប្រជាជនកម្ពុជាគួរគិតឱ្យបានច្បាស់លាស់ជាងនេះ ហើយឆ្លើយតបទៅនឹងស្ថានភាពនយោបាយថ្មីនេះ"។

លោក ឡៅ ម៉ុងហៃ អ្នកវិភាគនយោបាយឯករាជ្យបានមានប្រសាសន៍ថា ទោះបីជាការខិតខំប្រឹងប្រែងជាច្រើនដងរបស់គណបក្សសង្គ្រោះជាតិ ដើម្បីជំរុញឱ្យគណបក្សប្រជាជនកម្ពុជាសហការនៅក្នុងការស៊ើបអង្កេតលើការបោះឆ្នោតនេះមិនបានជោគជ័យក៏ដោយ ក៏វានៅតែមានការលំបាកសម្រាប់គណបក្សកាន់អំណាចដែរ? ក្នុងការបង្កើតរដ្ឋាភិបាលដោយគ្មានកិច្ចសហការរបស់គណបក្សសង្គ្រោះជាតិ។

លោក ឡៅ ម៉ុងហៃ បានមានប្រសាសន៍ថា "ប្រសិនបើមិនមានការចរចា និងគ្មានកិច្ចព្រមព្រៀង ហើយប្រសិនបើគណបក្សប្រជាជនកម្ពុជានៅតែដំណើរការទៅមុខដោយគ្មានគណបក្សសង្គ្រោះជាតិចូលរួមបង្កើតរដ្ឋសភាថ្មីទេនោះខ្ញុំគិតថា អាចមានភាពតានតឹងកាន់តែខ្លាំង"។ លោកបានមានប្រសាសន៍ថា "ដូច្នេះហើយមហាបាតុកម្មអាចមានទំហំកាន់តែធំ និងធ្វើទូទាំងប្រទេសនៅតាមកន្លែងផ្សេងៗគ្នា។ វាហាក់ដូចជាមេដឹកនាំទាំងពីររបស់គណបក្សសង្គ្រោះជាតិអាចប្រមូលប្រជាពលរដ្ឋបានកាន់តែច្រើន ហើយពួកគេបន្តធ្វើការតវ៉ានៅកន្លែងណាដែលពួកគេទៅ"។

*រាយការណ៍បន្ថែមដោយ ផន បុប្ផា*
*ប្រែសម្រួលដោយ មូល គីមហឿន*

# Huge Crowds, Few Police, at Opposition CNRP Rally

*By Phorn Bopha and Colin Meyn - September 7, 2013*

At a long-awaited demonstration Saturday morning by the opposition party to protest election results showing a victory for Prime Minister Hun Sen's long-ruling CPP, CNRP leaders Sam Rainsy and Kem Sokha promised further mass rallies should the government fail to meet their demand for an impartial investigation into the July 28 vote.

As Mr. Rainsy and Mr. Sokha took to the stage at about 8 a.m. in Freedom Park, they were cheered by a crowd that comfortably met the predicted 20,000 supporters the CNRP said would attend the demonstration.

Opposition officials had announced earlier this week that the rally was to be a morning of peace and meditative prayer rather than a push to change the government. Still, the event was reminiscent in many ways of the energetic opposition rallies that were held during the election campaign season and in the weeks following the contested vote.

Chants of "peace and justice" were intermingled with calls for change as Mr. Sokha and Mr. Rainsy both blasted the administration of Prime Minister Hun Sen in their speeches.

"We need Cambodia to have justice, freedom and to get out from under communist dictators," Mr. Sokha said. "The demonstrators have already warned that if there is no solution, we will keep demonstrating. And at the next demonstration, we won't only sit still."

Mr. Rainsy added that if the government does not heed opposition demands for justice regarding the contentious election results, non-violent demonstrations would spread beyond Freedom Park.

"The forest is destroyed and other natural resources are destroyed, they [the ruling CPP] are torturing our mother. We should come together in solidarity to help our mother," he said.

"From this day, the culture of non-violence will spread across the country."

Many in the crowd wore yellow headbands and carried signs that read, "My vote, my country," "Where is my vote?" and "We need an independent truth committee."

Since the National Election Committee [NEC] released preliminary election results showing a victory for the CPP, the opposition party has insisted on the creation of an impartial commission to investigate what it alleges was an election beset with irregularities that benefited Mr. Hun Sen's party.

Negotiations between the CNRP and CPP over the formation of such a commission stalled when the ruling party insisted on the NEC, which the CNRP has claimed was complicit in election flaws, leading the investigation, and ruled out a leading role for the U.N. or NGOs, one of the opposition's key demands.

Despite strong warnings from the authorities that they would tolerate no infraction of the rules governing the CNRP's rally, there was a minimal police presence at the demonstration. Scores of military police lined the roads around Freedom Park and riot police were on standby in nearby streets with water cannon trucks stationed at several locations downtown.

Leaders of Cambodia's Buddhist orders also told monks to abstain from attending any political protests, though hundreds of monks dressed in orange and saffron were visible in the crowd, and a small group were on stage to lead prayers before the speeches by the opposition leaders.

Keo Somaly, a monk from Phnom Penh's Neakvoan pagoda, said that the monks in attendance were not scared of the warnings of punishment from the Buddhist hierarchy should they attend.

"We want to join and we want to change the prime minister. Right now we want peace with justice, with freedom," he said.

Young opposition supporters expressed some reservations this week about the CNRP's decision to organize a pray-in rather than an outright demonstration, but thousands of enthusiastic youth were in attendance.

Thy Sovantha, a young CNRP activist, said that the demonstration was only the beginning of a campaign to get the government to begin acting on the opposition's demands.

"Today, [the CPP] will listen a little, but day by day they will listen a lot. We are asking for our votes because our votes are for our nation," she said.




**+ ស្ថាប័នក្នុងភាពដៃគូនៃមរតកឡូវែល-សួនប្រវត្តិសាស្ត្រជាតិនៃតំបន់ឡូវែលកម្មវិធីវីដេអូសហគមន៍**

ក្នុងនាមជាផ្នែកមួយនៃពាក្យស្លោក "សួនកំសាន្តយើងទីក្រុងយើងតំណាលរឿងយើង" ដែលជាគម្រោងកម្មវិធីទទួលជំនួយសម្រាប់បង្កើតកម្មវិធីវប្បធម៌ដល់ជនជំនាន់ក្រោយ សហការណ៍ផ្ទាល់ជាមួយស្ថាប័ននៃសួនប្រវត្តិសាស្ត្រជាតិតំបន់ឡូវែល ព្រមទាំងស្ថាប័នក្នុងភាពជាដៃគូនៃមរកឡូវែល សូមអញ្ជើញបងប្អូន និងប្រជាជនទាំងអស់ដែលរស់នៅក្នុងតំបន់ឡូវែលមកចែករំលែកប្រវត្តិរឿងរ៉ាវអនុស្សាវរីយ៍ហេតុការណ៍ដែលអ្នកបានជួបប្រទះពេលដែលអ្នករស់នៅក្នុងតំបន់ឡូវែល "រឿងរ៉ាវស្តីពីឡូវែល" ក្នុងកម្មវិធីវីដេអូសាធារណៈមួយ ។

លោកអ្នកគ្រាន់តែបង្កើតវីដេអូរយៈពេល៤នាទីចែករំលែករឿងរបស់អ្នកដល់សហគមន៍ដោយឆ្លើយនូវសំណួរ "តើឡូវែលមានអត្ថន័យ និងសារសំខាន់យ៉ាងណាដែរ ចំពោះអ្នក?" ។ **ឧទាហរណ៍ :**

-មេត្តាប្រាប់យើង ហេតុអ្វីអ្នកចាត់ទុកឡូវែលជាផ្ទះរបស់អ្នក?

-មេត្តាប្រាប់យើងអំពីទីកន្លែងពិសេសៗនៅក្នុងឡូវែល ។

-មេត្តាប្រាប់យើងអំពីបុគ្គលគម្រូក្នុងតំបន់ឡូវែល ។

-ឬអាចចូលរួមដោយសេរីក្នុងការបង្ហាញនូវគំនិតច្នៃប្រឌិតពាក់ព័ន្ធនឹងអនុស្សាវរីយ៍នានាដែលអ្នកមាននៅឡូវែល ។

**រង្វាន់ជ័យលាភី**

-រង្វាន់លេខ១ នឹងទទួលបានទឹកប្រាក់ ១៥00 ដុល្លារ

-រង្វាន់លេខ២នឹងទទួលបានទឹកប្រាប់៧៥0 ដុល្លារ

-រង្វាន់លេខ៣នឹងទទួលបានទឹកប្រាក់៥00 ដុល្លារ

-វីដេអូដែលទទួលបានប្រជាប្រិយភាពគាំទ្រច្រើនក្នុងប្រព័ន្ធអិនធឺណិត និងទទួលបានទឹកប្រាក់ ២៥0ដុល្លារ ។

ការប្រកួតនឹងចាប់ផ្តើមពីថ្ងៃទី១ ខែកក្កដា ឆ្នាំ២០១៣ ដល់ថ្ងៃទី៣១ ខែតុលា ឆ្នាំ២០១៣ ។

ស្វាគមន៍រាល់ការបង្ហាញពីគ្រប់មជ្ឈដ្ឋាន និងគ្រប់កម្រិតសិក្សា ។

**ទម្រង់នៃការប្រកួត :** អ្នកចូលរួមត្រូវបានស្នើសុំឱ្យបញ្ជូននូវវីដេអូរបស់ពួកគេតាមយូធូបទៅកាន់គេហទំព័រ យូធូបរបស់ អិល អេច ភី (LHP YouTube) ឬអាចផ្ញើ ជាឌីវីឌី DVD/ blu-ray ។ ផ្តល់ឱកាសឱ្យអ្នកទស្សនាគេហទំព័រអាចបោះឆ្នោតគាំទ្រវីដេអូណាមួយដែលគេពេញចិត្ត ។

វីដេអូដែលមានប្រជាប្រិយភាពនោះ នឹងត្រូវបានជ្រើសរើសដោយគណៈកម្មការ ។

រាល់ជ័យលាភី នឹងទទួលកិត្តិយសនៅក្នុងកម្មវិធីទទួលស្វាគមន៍មួយនៅដើមឆ្នាំ២០១៤ ប្រគល់នូវរង្វាន់ នឹងចាក់បង្ហាញវីដេអូដែលជាប់ចំណាត់ថ្នាក់ ។

រាល់ព័ត៌មានបន្ថែម និងលក្ខខន្តិកប្រកួត សូមពិត្យក្នុងគេហទំព័រ ។

**www.lowellheritagepartnership.org/Video**

# "Roots, Realities, and Dreams"

**Submitted by James Ostis**

Lowell Heritage Partnership is teaming up with Lowell National Historical Park for a community video project called "Roots, Realities and Dreams." The LHP is inviting members of the Lowell community to share their "stories of Lowell" in a public video project. Videos can be up to 4 minutes long, open to videographers of all skill levels, and can be about any subject that is Lowell-related. There will be a total $3000 in prizes. $1500 for first prize, $750 for second prize, $500 for third prize and $250 for fan favorite online vote.

Types of stories include telling a story of what makes Lowell "home," telling a story about a meaningful place in Lowell, or telling a story about a person who is a great representative for your Lowell experience. These are just suggestions. Any story is welcome (in any language). The contest is open until October 31st. For full rules and official Khmer language flier, please check out:

www.lowellheritagepartnership.org/video

# ខ្មែរ៣នាក់ឈរឈ្មោះជាតំណាងសហគមន៍ នៅរដ្ឋម៉ាស្សាឈូសេត



**លីន** (Lynn) **បោះឆ្នោតនៅថ្ងៃទី១៧ កញ្ញា ២០១៣ ជុំទី១**

**ហុង ណេត**

ឈរឈ្មោះឱ្យគេបោះឆ្នោតទុកចិត្តសម្រាប់អាណត្តិ២ឆ្នាំម្តងទៀត ក្នុងតួនាទីដដែល ។ ទីក្រុងលីន ជាប់គ្នានឹង រីវេ ។ (Revere) ជាតំបន់មួយទៀតនៃរដ្ឋម៉ាស្សាឈូសេត មានខ្មែររស់នៅច្រើនប្រមាណជា២ម៉ឺននាក់ ។



**ឡូវែល**(Lowell) **បោះឆ្នោតថ្ងៃទី២៤ កញ្ញា ២០១៣ ជុំទី១**

**វ៉ាស្នា ខួន** City Councilor

ឈរឈ្មោះឱ្យគេបោះឆ្នោតទុកចិត្តសារជាថ្មីម្តងទៀត សំរាប់អាណត្តិ២ឆ្នាំក្នុងតួនាទីដដែល ។



**វេន ពេជ្រ**

បេក្ខជនថ្មី ឈរឈ្មោះឱ្យគេបោះឆ្នោតទុកចិត្តសម្រាប់អាណត្តិ២ឆ្នាំក្នុងតួនាទីដំបូងរបស់ខ្លួន City Councilor ។

ឡូវែលជាតំបន់ដែលមានខ្មែរមករស់នៅតាំងពី៣០ឆ្នាំមកហើយៗ ក៏មានចំនួនច្រើនជាងគេបំផុត នាជ្រោយខាងកើត ស.រ.អា ៤ម៉ឺននាក់ ៕

# សុទិដ្ឋិនិយមរបស់ខ្ញុំចំពោះគណបក្សប្រជាជនកម្ពុជា

**ដោយ : សុងធុល ហៃ្យណង់ដេស**




សង្គ្រាមវៀតណាមនៅកម្ពុជាបានចាប់ផ្តើមនៅខែមិនា ឆ្នាំ១៩៧០ ។ នៅពេលសហរដ្ឋអាមេរិកបានសំរេចផ្តាច់ខ្លួនពីឥណ្ឌូចិនខ្មែរក្រហមបានចូលវាតទីនៅតាមជាយក្រុងភ្នំពេញនៅថ្ងៃទី១៧ ខែមេសា ឆ្នាំ១៩៧៥។ របបប្រល័យពូជសាសន៍ខ្មែរក្រហមបានសម្លាប់ប្រជាជនជាងពីរលាននាក់ក្នុងចំណោមប្រជាជនចំនួន៦លាននាក់អ្នករស់រានមានជីវិតចុងក្រោយដោយសារការវាយប្រហាររបស់កងទ័ពវៀតណាមទៅលើពួកខ្មែរក្រហមនៅថ្ងៃរំដោះទី៧ ខែមករា ឆ្នាំ១៩៧៩។ របបប្រល័យពូជសាសន៍បានបញ្ចប់ប្រជាជនកម្ពុជាបានរស់រានមានជីវិតដោយគ្មានការភ័យខ្លាចស្ថិតក្រោមការដាក់ទណ្ឌកម្មរបស់អង្គការសហប្រជាជាតិ ។

ប្រទេសកម្ពុជាបានរៀបចំការបោះឆ្នោតក្នុងលក្ខណៈប្រជាធិបតេយ្យនៅខែកក្កដា ឆ្នាំ១៩៩៣។ ប្រទេសក៏បានបោះជំហានចូលក្នុងសេដ្ឋកិច្ចទីផ្សារសេរីតាមរយៈការដាក់ទណ្ឌកម្មពីអង្គការសហប្រជាតិព្រមទាំងការដកកងទ័ពវៀតណាមទាំងអស់ចេញពីប្រទេសកម្ពុជា។

តាមរយៈប្រវត្តិសាស្រ្តកម្ពុជាសង្គ្រាមបានអូសបន្លាយរយៈពេល២០ឆ្នាំវែងជាសង្គ្រាមលោកលើកទីពីរសង្គ្រាមលើកទីមួយពីឆ្នាំ១៩១៤ដល់ឆ្នាំ១៩១៨ និងសង្គ្រាមលើកទីពីរនៅឆ្នាំ១៩៣៩ដល់ឆ្នាំ១៩៤៥។

បញ្ហាសង្គមរាប់មិនអស់ត្រូវបានដោះស្រាយៈ

-កងទ័ពខ្មែរក្រហមត្រូវបានបញ្ចូលជាកងទ័ពជាតិ ។

-ហេដ្ឋារចនាសម្ព័ន្ធ សំណង់ អាគារ ស្ពានថ្នល់ ត្រូវបានបង្កើតឡើងជាថ្មី ដើម្បីឱ្យប្រជាជនធ្វើចរាចរណ៍ និងដឹកជញ្ជូនតាមផ្លូវគមនាគមន៍ដោយសេរី

-បច្ចុប្បន្នអ្នកអាចធ្វើចរាចរណ៍នៅគ្រប់ទីកន្លែងក្នុងប្រទេសកម្ពុជាដោយសុវត្ថិភាពអំពើរចាប់ពង្រត់ ចោរឆក់ប្លន់ម៉ូតូ និងគ្រឿងអលង្ការត្រូវបានកាត់បន្ថយ ។ គំលាតគ្នារវាងអ្នកមាន និងអ្នកក្រ គឺជាបញ្ហាសំខាន់ ។ បច្ចុប្បន្នប្រជាជនកម្ពុជា ទើបតែទទួលបាននូវសន្តិភាព និងស្ថេរភាពសង្គមហេតុនេះពួកគេប្តេជ្ញាការពារនូវភាពសុខសាន្តគ្មានសង្គ្រាមជារៀងរហូត។ ការបោះឆ្នោតក្នុងឆ្នាំ២០១៣នេះបានបង្ហាញថា ប្រជាជនដែលមានសិទ្ធិបោះឆ្នោតមានចំនួន៩.៦លាននាក់ និងបានទៅចុះឈ្មោះបោះឆ្នោតមានចំនួន៥៥%។

-៥៥ភាគរយបានបោះឆ្នោតជូនគណបក្សកាន់អំណាច(PPC) និង៤៥ភាគរយបោះជូន គណបក្សប្រឆាំង(NRCP)ដែលជិតស្មើពាក់កណ្តាលនៃប្រជាជនកម្ពុជា ។

-ប្រជាជនប្រមាណ៤៥ភាគរយនៃចំនួនសរុប ៩.៦លាននាក់ដែលបានចុះឈ្មោះក្នុងបញ្ជីបោះឆ្នោតមិនចង់សម្តែងមតិតាមរយៈសន្លឹកឆ្នោតនោះទេ។

គណបក្សប្រឆាំងបានប្រកាសមិនព្រមទទួលស្គាល់លទ្ធផលនៃការចាញ់ឆ្នោតដោយអះអាងថាមានភាពមិនប្រក្រតីជាច្រើននៅអំឡុងពេលបោះឆ្នោត និងដោយមានភាពជឿជាក់ទៅលើប្រជាជនគាំទ្រគណបក្សដ៏ច្រើនអនេកក្នុងបំណងចង់ផ្លាស់ប្តូររដ្ឋាភិបាល។ តាមរយៈអត្ថបទខ្ញុំមានឆន្ទៈបង្ហាញនូវអាថិកំបាំងនៃបំណងប្រាថ្នាដ៏ជ្រាលជ្រៅរបស់ប្រជាជន៤៥ភាគរយដែលបានបោះឆ្នោតគាំទ្រគណបក្សប្រឆាំងហើយដែលមិនអាចបញ្ចេញមតិផ្ទាល់ខ្លួនតាមរយៈសន្លឹកឆ្នោត។

ចំនួនមនុស្សដ៏ច្រើនលើសលប់បានរង់ចាំស្វាគមន៍ការធ្វើមាតុភូមិនិវត្សរបស់លោក សម រង្ស៊ី មេដឹកនាំគណបក្សប្រឆាំងនៅថ្ងៃទី១៩ ខែកក្កដា ឆ្នាំ២០១៣ ដែលជាការសក្ខីភាពបញ្ជាក់នូវការគាំទ្រដ៏រឹងមាំចំពោះគណបក្សមួយនេះ។ នៅក្នុងគំនិតរបស់ខ្ញុំ៤៥ភាគរយមិនចង់បញ្ចេញមតិតាមរយៈសន្លឹកឆ្នោត ពីព្រោះពួកគាត់ចង់បាននូវលទ្ធិប្រជាធិបតេយ្យដែលធានានូវស្ថេរភាពសង្គមភាពចំរើនរុងរឿង និងគ្មានអំពើពុករលួយ។ នេះជាមូលហេតុដែលប្រជាជនពិបាកសំរេចចិត្តក្នុងការគាំទ្រគណបក្សកាន់អំណាច ឬមួយគណបក្សប្រឆាំង។

តាមរយៈសន្លឹកឆ្នោតដ៏ស្មោះត្រង់ និងចំនួនអវត្តមានបញ្ជាក់ពី

- ភាពថមថយអំណាចរបស់រដ្ឋាភិបាល

-ភាពរឹងមាំរបស់គណបក្សប្រឆាំងក្នុងរដ្ឋសភាជាតិ

-អង្គភាពទាំងពីរធ្វើការជាមួយគ្នាក្នុងស្មារតីបង្រួបបង្រួមប្រាកដជាធានាបាននូវស្ថេរភាពសង្គមយ៉ាងល្អប្រសើរ

តទៅទំព័រទី ២០

# សហគ្រិនជុំវិញតំបន់ឡូវែលរួមគ្នាទទួលរង្វាន់៣០ម៉ឺនដុល្លារ ពីកម្មវិធីសេនបក្សរដូវក្ដៅឆ្នាំ២០១៣

## Lowell Entrepreneurs Share $30K Prize Pool a Sandbox Summer Accelerator Awards

-Submitted by Lianna Kushi
-Edited by Soben Pin
-Translated by Sokha
Photos Courtesy by Merrimack Valley Sandbox

**ថ្ងៃទី១០កញ្ញា :** កម្មវិធីសេនបក្សរដូវក្ដៅឆ្នាំ២០១៣ប្រព្រឹត្តទៅនៅអគារអេវឺរែតមៀល (Everett Mills) ក្នុងតំបន់ឡរិន(Lawrence) ដើម្បីប្រារព្ធនូវការផ្ដល់រង្វាន់៣០ម៉ឺនដុល្លារទៅដល់ជ័យលាភី៨រូប។ អ្នកចូលរួមកម្មវិធីសរុប១២០នាក់ក្នុងតំបន់បានមកអបអរសាទរសហគ្រិនទាំងឡាយដែលទទួលជ័យលាភី។ ក្នុងចំណោមសហគ្រិនប្រកួតទាំង១៦រូប មានសហគ្រិនខ្មែរអាមេរិកាំងនៅឡូវែលចំនួនពីររូបដែលចូលរួមប្រកួតមានលោក សំ ហ៊ី ស្ថាបនិកចលនា ដើម្បីពានមេដៃ (Medallion Movement) និងមួយរូបទៀត គឺអ្នកនាង ឆវី ស៊ីនួន ស្ថាបនិក Style This Shindig។ ខណៈដែលអ្នកទាំងពីរមិនបានទទួលជ័យលាភីពីកម្មវិធី ប៉ុន្តែគេបានឱ្យតម្លៃលើការបង្កើតកម្មវិធីនេះឡើង ដោយគេបានថ្លែងថា ចូលរួមក្នុងកម្មវិធីនេះខ្ញុំស្ទើរតែមិនជឿថា **តទៅទំព័រទី២៥**




*From Left to Right: David Parker (Executive Director of the Merrimack Valley Sandbox), Will Andronico (Partner at MFA Accounting) Jaishree Deshpande(co-founder of the Deshpande Foundation), Erin, Steve Kaufer (Co-Founder & CEO of Trip Advisor.com), Desh Deshpande (co-founder of the Deshpande Foundation)."*

●●●September 10th -The Sandbox Summer Accelerator 2013 Awards Ceremony was held at the Everett Mills in Lawrence to celebrate the conclusion of the program and award a $30K Prize Pool to the top winners. Over 120 people from around the region came to cheer on these entrepreneurs. Of the sixteen entrepreneurs two are Cambodian Americans from Lowell, Sam Hy, founder of The Medallion Movement and Chhavy Sinuon, founder of Style This Shindig. While they did not win prize money, they said the experience was invaluable, Sam said, "Going into the program I had no idea it would make me this more sure of what I'm doing for my business. I have become more confident and stronger."

For the last eleven weeks, sixteen early-stage entrepreneurs took part in the 2013 Sandbox Summer Accelerator Program. These entrepreneurs were able to move their businesses and non-profits forward through workshops, mentors, working space, and funding. For many, the Sandbox Accelerator had major impacts on their business. "Three months ago, Little Leaders was just an idea," says Leslie Rivera of Lawrence. "Because of the Sandbox, this is now a business!" For Greg Page of Lowell, the program has increased business for the Merrimack Analysis Group. "Being a part of the Sandbox Accelerator has led to a threefold increase in our client base. There's no doubt this opportunity has taken my business to the next level." **Continued Page 25**

**Continued from Page19**

## តមកពីទំព័រទី ១៨ សុទិដ្ឋិនិយមរបស់ខ្ញុំ ចំពោះគណបក្ស...

ការមិនយល់ស្របតាមគណបក្សប្រឆាំងមានដូចជា:

១-បុគ្គលិកលក្ខណៈផ្ទាល់របស់មេដឹកនាំនេះ

- អាកប្បកិរិយាដែលមិនអាចទទួលយកបាននៅឆ្នាំ១៩៩៨ពេលដែលលោក សម រង្ស៊ី បាននិយាយថា លោកចង់ឱ្យសហរដ្ឋអាមេរិកទម្លាក់គ្រាប់បែកចំលំនៅដ្ឋានរបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន តែម្តង(L'Humanité ថ្ងៃទី១៧ ខែកញ្ញា ឆ្នាំ១៩៩៨)

-ការនិយាយប្រឆាំងជនជាតិវៀតណាមនៅចំកណ្តាលសហគមន៍ដ៏ធំរបស់ជនជាតិកម្ពុជាដើមកំណើតវៀតណាម ។ បង្កឱ្យមានអារម្មណ៍ស្អប់ខ្ពើមរើសអើងជាតិសាសន៍ និងជាមូលហេតុឆ្លុះបញ្ចាំងពីសង្គ្រាមប្រវត្តិសាស្ត្រដែលបានកើតឡើង និងបានបញ្ចប់ទៅវិញនៅថ្ងៃ៧មករា ឆ្នាំ១៩៧៩ ដោយកងទ័ពវៀតណាមបានជួយរំដោះប្រជាជនកម្ពុជាឱ្យរួចផុតពីរបបខ្មែរក្រហម ។

-តើគួរទុកចិត្តលើគោលនយោបាយរបស់គណបក្សយ៉ាងណា បើសមាជិកខ្លះរបស់បក្សប្រឆាំងបានចុះចូលជាមួយគណបក្សកាន់អំណាច

ភ្នំពេញប៉ុស្តិ៍ថ្ងៃទី៣០ ខែវិច្ឆិកា ឆ្នាំ២០០៩

-ការថ្លែងរបស់គណបក្សប្រឆាំងដោយប្រើពាក្យថា "ប្តូរ" ដែលសំដៅទៅលើការផ្លាស់ប្តូរមេដឹកនាំដោយមិនបានគិតពីស្ថេរភាពសង្គម និងមនុស្សជាតិទាំងមូល ។

-ការប្រឆាំងដែលផ្ទុយពីវិថីឆ្ពោះទៅកាន់ការបង្រួបបង្រួមសាមគ្គីជាតិ គឺជាសញ្ញានៃភាពបាក់បែក ។

៣-លទ្ធភាពក្នុងការដោះស្រាយបញ្ហាសំខាន់ ២

មនុស្សជាតិត្រូវមានការទទួលខុសត្រូវក្នុងការចូលរួមដោះស្រាយបញ្ហានៅពេលប្រទេសជាតិកំពុងជួបវិបត្តិ ។ ប្រទេសកម្ពុជាធ្លាប់មានជំលោះប្រដាប់អាវុធជាមួយប្រទេសថៃដែលចង់ដណ្តើមយកប្រាសាទព្រះវិហារស្ថិតក្នុងសភាពគ្រោះថ្នាក់សំរាប់ប្រជាជន និងប្រទេសកម្ពុជា នេះលោក សម រង្ស៊ី បែរជាឆ្លៀតឱកាសបង្កើតបញ្ហាព្រំដែនរវាងកម្ពុជាជាមួយប្រទេសវៀតណាមបន្ថែមទៀត ជម្លោះព្រំដែនជាមួយវៀតណាមនេះបានកើតឡើងនៅថ្ងៃទី២៥ ខែតុលា ឆ្នាំ២០០៩ កម្ពុជាប៉ុស្តិ៍ថ្ងៃទី១៧ ខែវិច្ឆិកា ឆ្នាំ២០០៩

-ការសន្យាមិនច្បាស់លាស់ដោយគ្មានដំណោះស្រាយសមហេតុផលដែលគណបក្សបានលើកឡើងពីបញ្ហាសង្គមដូចជាការបំបាត់អំពើពុករលួយ កែប្រែប្រព័ន្ធច្បាប់ ការតម្លើងប្រាក់បៀវត្សរ៍ជាដើម ។ល ។

ដោយហេតុផលខាងលើធ្វើឱ្យខ្ញុំមានទំនោរទៅលើគណបក្សប្រជាជនកម្ពុជា ពីព្រោះជាគណបក្សដែលអាចរក្សានូវស្ថេរភាពសង្គមកាន់អំណាចតាមរយៈសន្លឹកឆ្នោតរបស់ប្រជាជន ប៉ុន្តែក៏ជាគណបក្សដែលធ្លាប់ប្រើប្រាស់អំណាចរបស់ខ្លួនដើម្បីបំពានសេចក្តីទុកចិត្តរបស់ប្រជាជនគណបក្សនេះនឹងអាចស្តារនូវអំណាចរបស់ខ្លួនឡើងវិញ ប្រសិនបើកំលាំងដ៏រឹងមាំរបស់គណបក្សប្រឆាំងចូលរួមធ្វើការរួមគ្នាក្នុងគោលបំណងបំរើផលប្រយោជន៍ជាតិ ។

អនាគតរបស់ប្រទេសកម្ពុជាអាស្រ័យទៅលើការដឹកនាំប្រកបដោយស្ថេរភាពខ្ញុំមានជំនឿថា គណបក្សប្រឆាំងនឹងអង្គុយលើអសនៈនៅក្នុងរដ្ឋសភាជាតិយ៉ាងរឹងមាំចូលរួមចំណែកបំពេញការងារជាមួយរាជរដ្ឋាភិបាលដើម្បីបំរើប្រទេសជាតិ ។

ខ្ញុំគ្មានជំនឿថា គណបក្សប្រឆាំងអាចផ្លាស់ប្តូរអនាគតរបស់ប្រទេសកម្ពុជា និងអាចប្រឈមមុខក្នុងការដោះស្រាយនូវបញ្ហាធំ២ដូចជាអំពើពុករលួយ ភាពអយុត្តិធម៌ក្នុងសង្គម និងវិបត្តិខ្វះទីផ្សារការងាររបស់យុវជនខ្មែរឡើយ ។

លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ប្រាកដជាមានលទ្ធភាពដោះស្រាយនូវបញ្ហាក្នុងសង្គមទាំងឡាយប្រកបដោយស្មារតីបង្រួបបង្រួមដោយមិនមានការប្រេះស្រាំ និងកាប់សម្លាប់បង្ហូរឈាម ។

ក្នុងអត្ថបទនេះបានបង្ហាញពីភាពអវិជ្ជមានក្នុងការដឹកនាំរបស់លោក ហ៊ុន សែន និងបក្ខពួកក្នុងគណបក្សប្រជាជន ។ ប៉ុន្តែសំរាប់ខ្ញុំអ្វីដែលសំខាន់បំផុតគឺគាំទ្រការដឹកនាំដែលនាំមកនូវសន្តិភាពសង្គមក្នុងស្មារតីបង្រួបបង្រួមជាតិដោយបានជំនះនូវឧបសគ្គច្រើនអនេកដែលបានកើតមានឡើងតាំងពីការបោះឆ្នោតលើកដំបូងនៅឆ្នាំ១៩៩៣ ។

នៅតាមផ្លូវខ្ញុំបានចោទសួរខ្លួនឯងយ៉ាងច្រើន ។

អ៊ីរ៉ាក់បានកសាងប្រទេសដោយបានស្វែងរកលទ្ធិប្រជាធិបតេយ្យជាច្រើនជំនាន់ ។

ជំនួសអំណាចផ្តាច់ការប្រទេសមីយ៉ានម៉ាបានបានងាកមកអនុវត្តនូវលទ្ធិប្រជាធិបតេយ្យ ។

ចំណែកខ្ញុំបានសំរេចចិត្តជ្រើសរើសយកស្ថេរភាពសង្គមជាសំខាន់ ។

ខ្ញុំគឺជាប្រជាជនកម្ពុជាម្នាក់ដែលបានគាំទ្រគណបក្សប្រជាជនកម្ពុជា PPC ខ្ញុំបានបោះឆ្នោតដោយស្មោះសរ និងត្រៀមខ្លួនដើម្បីបោះឆ្នោតម្តងទៀតនៅអណត្តិក្រោយ ៕

**សុង ធុលហ្វៃលជេស**

# បុរសគួរការពារខ្លួនពីមហារីកក្រពេញប្រូស្តាតដោយវិធីណា?

ក្នុងនាមជាជម្ងឺមហារីកដែលមានលក្ខណៈពិសេសនៃភេទតែមួយមហារីកក្រពេញប្រូស្តាតបានក្លាយជាមហារីកកាចសាហាវមួយដែលឧស្សាហ៍កើតមានក្នុងប្រព័ន្ធអវយវបន្តពូជបុរស។ វេជ្ជបណ្ឌិតនៃមន្ទីរពេទ្យក្លាងចូវផ្នែកមហារីកបង្ហាញថា កើតជម្ងឺក្រពេញប្រូស្តាតតាមពិតមិនធ្ងន់ធ្ងរទេ អ្វីដែលធ្ងន់ធ្ងរបំផុតនោះគឺជម្ងឺនោះវិវដ្តក្លាយជាមហារីកក្រពេញប្រូស្តាត។ ដូច្នេះបុរសគួរឃ្លាតឆ្ងាយពីមហារីកក្រពេញប្រស្តាតដោយរបៀបណាខាងក្រោមនេះសូមស្តាប់វេជ្ជបណ្ឌិតឯកទេសធ្វើការបកស្រាយ។


រូបភាពមន្ទីរពេទ្យក្លាងចូវទំនើបផ្នែកមហារីក

ការស្រាវជ្រាវវេជ្ជសាស្ត្ររបស់មន្ទីរពេទ្យក្លាងចូវទំនើបផ្នែកមហារីកពាក់ព័ន្ធជម្ងឺនេះបានបង្ហាញថាមហារីកក្រពេញប្រូស្តាតកើតឡើងមានជាប់ពាក់ព័ន្ធនឹងរចនាសម្ព័ន្ធអាហារនិងការទទួលទានញឹកញាប់។ ការបរិភោគជាតិខ្លាញ់ខ្ពស់ត្រូវបានទទួលស្គាល់ជាផ្លូវការថាជាកត្តាគ្រោះថ្នាក់ដែលបណ្តាលអោយកើតមានមហារីកក្រពេញប្រូស្តាតតំបន់ដែលប្រភពទឹកផឹកសំបូរធាតុកាល់ស្យូមខ្ពស់អត្រាកើតមហារីកក្រពេញប្រូស្តាតក៏ខ្ពស់ដែរ។ ចំណែកឯសារធាតុកែតុនវិសភាគក្នុងសណ្តែកសារធាតុតេលិកាឈើក្នុងគ្រាប់ធញ្ញជាតិនិងសារធាតុអាមីនហ្វាំណុលក្នុងតែបៃតងសុទ្ធតែសំបូរទៅដោយអ៊ីសត្រូហ្សែនរុក្ខជាតិដែលមានប្រយោជន៍ទប់ស្កាត់មហារីក ដូច្នេះបើចង់ឃ្លាតឆ្ងាយជម្ងឺមហារីកលំពែងមិត្តបុរសទាំងឡាយគួរទទួលទានអាហារប្រភេទទាំងនេះអោយបានច្រើនក្នុងជីវភាពប្រចាំថ្ងៃ។

**កែសម្រួលសង្វាក់រស់នៅពន្យាជរាភាព**

មហារីកក្រពេញប្រូស្តាតច្រើនកើតឡើងនៅលើបុរសវ័យចំណាស់ ដូច្នេះមិត្តបុរសទាំងអស់គួរជ្រើសរើសវិធីរស់នៅបែបសុខភាពរស់រវើកធ្វើអោយបានការបរិភោគសមស្របហាត់ប្រាណសមល្មមផ្តាច់បារីឬកម្រិតការជក់រក្សាសមតុល្យលំនឹងទឹកចិត្តពង្រឹងប្រព័ន្ធរាងកាយពន្យាជរាភាពអាចកាត់បន្ថយអត្រាកើតជម្ងឺមហារីកក្រពេញប្រូស្តាត។

**តមបារី**

បារីគឺជាកត្តាគ្រោះថ្នាក់មួយផ្សេងទៀតដែលបណ្តាលអោយកើតមហារីកក្រពេញប្រូស្តាត។ បុរសភេទគួរកាត់បន្ថយការជក់បារី កាត់បន្ថយផលប៉ះពាល់គ្រោះថ្នាក់បារីទៅលើខ្លួនប្រាណមនុស្ស។ ដូច្នេះតមបារីក៏ជាវិធីមួយឃ្លាតឆ្ងាយពីជម្ងឺមហារីកក្រពេញប្រូស្តាតផងដែរ។

**ពង្រឹងការអប់រំយល់ដឹងផ្នែកសិច**

ការស្រាវជ្រាវវេជ្ជសាស្ត្រនៃមន្ទីរពេទ្យក្លាងចូវទំនើបផ្នែកមហារីកពាក់ព័ន្ធនឹងនេះបានបង្ហាញថា ការកើនឡើងនៃហានិភ័យមហារីកក្រពេញប្រូស្តាតមានពាក់ព័ន្ធនឹងជម្ងឺកាមរោគឆ្លង ជាពិសេសគឺប្រមេះ និងស្រែងទឹក។ល។ ទោះបីជាបច្ចុប្បន្នមិនទាន់អាចបញ្ជាក់ពីយន្តការកើតជម្ងឺមហារីកក្រពេញប្រូស្តាត ប៉ុន្តែជាទូទៅយល់ថា មានពាក់ព័ន្ធនឹងអ័រម៉ូនបាត់បង់សមតុល្យលំនឹងការស្រាវជ្រាវថ្មីៗនេះបានក្រើនរំលឹកថា ជម្ងឺរលាកមួយចំនួនមានទាក់ទងនឹងជម្ងឺមហារីកក្រពេញប្រស្តាត។

ខាងលើគឺជាការណែនាំបុរសភេទធ្វើយ៉ាងណាឃ្លាតឆ្ងាយពីជម្ងឺមហារីកក្រពេញប្រូស្តាត សង្ឃឹមថាមិត្តបុរសទាំងឡាយប្រុងប្រយ័ត្នបន្ថែមក្នុងជីវភាពរស់នៅប្រចាំថ្ងៃ។ ជាការពិតណាស់បើសិនរកឃើញរោគសញ្ញាដែលស្រដៀងនឹងជម្ងឺមហារីក្រពេញប្រូស្តាតនេះ ត្រូវតែធ្វើការពិនិត្យនិងព្យាបាលនៅមន្ទីរពេទ្យឯកទេសត្រឹមត្រូវអោយបានទាន់ពេលវេលាជៀសវាងខកឱកាសព្យាបាលដ៏ល្អបំផុត បណ្តាលអោយកើតមានរោគសញ្ញាផ្សេងបន្ថែម។

**អត្ថបទដោយៈ មន្ទីរពេទ្យក្លាងចូវទំនើបផ្នែកមហារីក**

# លោកអ្នកដែលមានផ្ទះជាម្ចាស់ផ្ទះ សូមអានអត្ថបទនេះ



**ផ្សព្វផ្សាយដោយ ជើង អ៊ូ សមាជិកសភា ក្រុងហ្វីឡាដែលហ្វៀ**

**I- ការបង់ពន្ធអចលនទ្រព្យ**

ទីក្រុង និងសាលាថ្នាក់ស្រុកនៅរដ្ឋហ្វីឡាដេលហ្វីយ៉ា Philadelphia យកពន្ធលើអចលនទ្រព្យទាំងអស់នៅក្នុងទីក្រុង ។ ការិយាល័យវាយតម្លៃទ្រព្យសម្បត្តិ (Office of Property Assessment ) កំណត់តម្លៃទ្រព្យសម្បត្តិក្នុងនោះការបង់ពន្ធនានាត្រូវបានបង់ជូន ។ នាយកដ្ឋានប្រាក់ចំណូល (Department of Revenue) ផ្ញើតាមប្រៃសណីយ៍នូវវិក្កយបត្របង់ពន្ធអចលនទ្រព្យនៅខែធ្នូ ។

ការបង់ប្រាក់ពន្ធអចលនទ្រព្យដល់ពេលកំណត់សង ហើយដែលអាចបង់ប្រាក់នៅថ្ងៃទី៣១ ខែមីនា ។ ប្រសិនបើអ្នករស់នៅអចិន្ត្រៃយ៍បង់ប្រាក់តាមវិក្កបត្រនៅថ្ងៃចុងក្រោយ ឬមុនថ្ងៃចុងក្រោយនៃខែកុម្ភៈនោះ អ្នករស់នៅអចិន្ត្រៃយ៍នឹងទទួលបានការបញ្ចុះតម្លៃ១%ភាគរយ ។ អ្នករស់នៅអចិន្ត្រៃយ៍បង់ប្រាក់ក្រោយថ្ងៃទី៣១ ខែមីនា នោះអ្នករស់នៅអចិន្ត្រៃយ៍រូបនេះ ត្រូវបានគេកំណត់ការបង់ថ្លៃកើនឡើង ។ បុគ្គលណាមួយដែលមិនអាចបង់ប្រាក់តាមការបរិច្ឆេទកំណត់ត្រូវទាក់ទងមកនាយកដ្ឋានប្រាក់ចំណូល (Department of Revenue) ជាបន្ទាន់ តាមលេខ : ២១៥-៦៨៦-៦៤៤២ ដូច្នេះយើងខ្ញុំអាចជួយពួកគេ ដើម្បីឆ្លើយតបនឹងកាតព្វកិច្ចពន្ធរបស់ពួកគេជាមួយកិច្ចព្រមព្រៀងការបង់ប្រាក់ ។ លើសពីនេះ យើងខ្ញុំអាចពិភាក្សាអំពីកម្មវិធីបន្ធូរបន្ថយពន្ធអចលនទ្រព្យ ។ បច្ចុប្បន្នព័ត៌មានដែលពាក់ព័ន្ធកម្មវិធីបន្ធូរបន្ថយអាចរកបានត្រូវបានរាប់បញ្ចូលក្នុងកញ្ចប់នេះ ។

## REAL ESTATE TAXES

The City and the School District of Philadelphia impose a tax on all real estate in the City. The Office of Property Assessment determines the value of the property on which the taxes must be paid. The Department of Revenue mails out the real estate tax bills in December.

Real Estate tax payments are due and payable on March 31. If a resident pays the bill on or brfore the last day of February, the resident will receive a 1% discount. If a resident pays after March 31, the resident is subject to increased charges. Anyone unable to pay by the due date should immediately contact the Department of Revenue at 215-686-6442 so we can help them meet their tax obligation with a payment agreement. In addition we candiscuss Real Estate Tax relief programs. Information concerning relief programs currently available is included in this packet.

## II- កម្មវិធីបន្ធូរបន្ថយពន្ធអចលនទ្រព្យ

នាយកដ្ឋានប្រាក់ចំណូល(Department of Revenue) គ្រប់គ្រងកម្មវិធីបន្ធូរបន្ថយពន្ធអចលនទ្រព្យដូចខាងក្រោម :

**កិច្ចព្រមព្រៀងស្តីពីប្រាក់ចំណូលទាប និង លក្ខខណ្ឌពន្យារពេលសង (កិច្ចព្រមព្រៀងស្តីពីការខ្វះខាតប្រាក់)**

កិច្ចព្រមព្រៀងនេះផ្តល់លក្ខខណ្ឌពន្យារពេលសងពីអ្នករស់នៅអចិន្ត្រៃយ៍ដែលមានកម្រិតប្រាក់ចំណូលទាបសម្រាប់ការបង់ប្រាក់ពន្ធអចលនទ្រព្យ ។ អ្នករស់នៅអចិន្ត្រៃយ៍នានាត្រូវជាម្ចាស់កម្មវិធីនៃកំណត់ត្រារបាយការណ៍នេះ ហើយមានទីលំនៅលើអចលនទ្រព្យ ។ លិខិតបញ្ជាក់ប្រាក់ចំណូលសម្រាប់សមាជិកក្រុមគ្រួសារតម្រូវឱ្យមានផងដែរ ដែលជាភស្តុតាងបញ្ជាក់អំពីការចំណាយប្រាក់ក្នុងក្រុមគ្រួសារប្រចាំខែថ្មីៗនេះ ។

**ប្រាក់បម្រុងទុកពន្ធពិសេសសម្រាប់ពលរដ្ឋចាស់ៗដែលមានប្រាក់ចំណូលទាប (ការបញ្ឈប់ពន្ធ)**

កិច្ចព្រមព្រៀងនេះ អនុញ្ញាតឱ្យពលរដ្ឋចាស់ៗដែលមានប្រាក់ចំណូលទាប ដើម្បីទទួលបានការលើកលែងចំពោះការកើនឡើងវិក្កយបត្រពន្ធអចលនទ្រព្យរបស់ពួកដែលបណ្តាលមកពីការកើនឡើងលើអត្រាពន្ធ ឬកើនឡើងលើតម្លៃដែលបានវាយតម្លៃចំពោះផ្ទះរបស់ពួកគេ ។ នៅពេលពលរដ្ឋចាស់ៗបានចូលកម្មវិធីនេះវិក្កយបត្រពួកគេមិនអាចកើនឡើងនៅខណៈពេលពួកគេនៅតែមានសិទ្ធិស្របច្បាប់ ។ មានសេចក្តីណែនាំក៏ដូចជាសេចក្តីណែនាំអំពីប្រាក់ចំណូលដែលអាចអនុវត្តចំពោះកម្មវិធីនេះ ។

**ផែនការសងបណ្តាក់ ឬសងបន្តិចម្តងៗពីពលរដ្ឋចាស់ៗដែលមានប្រាក់ចំណូលទាប**

ផែនការណ៍នេះផ្តល់ជូនអ្នករស់នៅអចិន្ត្រៃយ៍ដែលមានប្រាក់ចំណូលទាប ដើម្បីបង់វិក្កយបត្រពន្ធអចលនទ្រព្យនាពេលបច្ចុប្បន្នរបស់ពួកគេទៅតាមការសងបណ្តាក់ ឬសងបន្តិចម្តងៗប្រចាំខែដោយគ្មានពិន័យជាប្រាក់ឡើយ ។ សេចក្តីណែនាំអំពីប្រាក់ចំណូលអាចអនុវត្តបានចំពោះផែនការណ៍នេះ ។ ប្រសិនបើយល់ព្រមនោះ អ្នករស់នៅអចិន្ត្រៃយ៍នឹងទទួលបានសៀវភៅជាប័ណ្ណតំណាងសាច់ប្រាក់ដែលត្រូវបញ្ជូនតាមប៉ុស្តិ៍ប្រៃសនីយ៍នៅថ្ងៃទី១ ខែឧសភា ឆ្នាំ២០១៣ ហើយការបង់ប្រាក់លើកទី១ ដល់ពេលត្រឹមថ្ងៃទី១៥ ខែឧសភា ឆ្នាំ២០១៣ ។ នៅឆ្នាំបន្ទាប់អ្នករស់នៅអចិន្ត្រៃយ៍ដែលទទួលបានអនុម័តនោះ នឹងត្រូវបានចុះឈ្មោះដោយស្វ័យប្រវត្តិក្នុងផែនការសងបណ្តាក់ ឬសងបន្តិចម្តងៗរយៈពេល១២ខែ និងទទួលបានសៀវភៅជាប័ណ្ណតំណាងសាច់ប្រាក់នៅខែធ្នូ ឆ្នាំ២០១៣ សម្រាប់ពន្ធអចលនទ្រព្យឆ្នាំ២០១៤ ។ ផែនការបង់ប្រាក់នេះអនុវត្តចំពោះអ្នករស់នៅអចិន្ត្រៃយ៍ដើមដំបូងតែប៉ុណ្ណោះ ។ អ្នករស់នៅអចិន្ត្រៃយ៍ម្នាក់អាចត្រូវបានគេលុបឈ្មោះចេញពីផែនការ បើការបង់ប្រាក់ប្រចាំខែណាមួយមិនត្រូវបានបង់ជូននៅខណៈដល់ពេលសង ។

## ឥណទានពន្ធសម្រាប់ការបម្រុងទុកពន្ធករណីកិច្ចសកម្ម/សមាជិកការពារជាតិ ចំពោះពន្ធករណីសកម្មដែលស្ថិតនៅក្រៅរដ្ឋផេនស៊ីលវ៉ានៀ Pennsylvasia

ផែនការនេះផ្តល់ជូនឥណទានពន្ធសម្រាប់សមាជិកនានាដែលបានប្រកាសពន្ធករណីកិច្ចសកម្មដែលស្ថិតនៅក្រៅរដ្ឋផេនស៊ីលវ៉ានៀ Pennsylvasia ។

ឥណទានអនុវត្តចំពោះអ្នករស់នៅអចិន្ត្រៃយ៍ដើមដំបូងប៉ុណ្ណោះ ។

អ្នកដាក់ពាក្យសុំនានាត្រូវផ្តល់ជូនភស្តុតាងឯកសារដើម្បីបង្កើតភាពមានសិទ្ធិស្របច្បាប់សម្រាប់ឥណទាន បើតម្រូវឱ្យមានដោយនាយកដ្ឋានប្រាក់ចំណូល (Department of Ravenue) ។

សហគមន៍ Commonwealth រដ្ឋផេនស៊ីលវ៉ានៀ Pennsylvania គ្រប់គ្រងកម្មវិធីបន្ធូរបន្ថយពន្ធអចលនទ្រព្យ ដូចខាងក្រោមនេះ :

**កម្មវិធីស្តីពីការលើកលែងពន្ធអចលនទ្រព្យអតីតយុទ្ធជនពិការ**

សម្រាប់ព័ត៌មានបន្ថែម សូមទស្សនាវេប សាយ : http://www.portal.state.pa.us

## REAL ESTATE TAX RELIEF PROGRAMS

The Department of Revenue administraters the follow real tax relief programs:

**Low Income and Extended Term Agreement (Hardship Agreement)**

This agreement provides low-income residents extended terms for real estate tax payment. Residents must be the owner of record and reside in the property. Proof of income for each household member is required as well as proof current monthly household expenses.

**Senior Citizen Low Income Special Tax Provisions (Tax Freeze)**

This agreement allows low income senior citizens to receive forgiveness on increases on their real estate tax bills caused by increases in tax rates or increases on the assessed value of their homes. Once a senior citizen has entered the program, their bill cannot increase while they remain eligible. There are age guidelines as well as income guidelines applicable to this program.

**Low Income/Senior Citizen Installment Plan**

This plan provides for low income residents to pay their current real estate tax bill in monthly installments without penalty. Income guideline are applicable to this plan. If accpted, residents will receive a coupon book which is mailed May 1,2013, first payment due by May 15,2013. In subseguent years, approved residents will automatically be enrolled in a 12 month installment plan and receive coupon book in December 2013 for 2014 real estate taxes. This payment plan applies to primary residence only. A resident may be removed from plan if any monthly payment is not paid when due.

**Tax Credit for Active Duty Reserve/National Guard Members on Active Duty Outside Pennsylvania**

Contunued to Page 23

តមកពីទំព័រទី ២២ លោកអ្នកដែលមានផ្ទះជាម្ចាស់ផ្ទះ...

This plan provides a tax credit for members called to active duty outside Pennsylvania. Credit applies to primary residence only. Applicats must provide documentary proof to establish eligibility for the credit if requested by the Deparment of Revenue.

The Commonwealth of Pennsylvania administers the following real estate tax relief programs:

**Disabled Veterans Real Estate Tax Exemption Program**
For more information, visit website at: http://www:portal.state.pa.us

**Property Tax/Rent Rebate Program**
For more information, visit website:http://www.revenue.state.pa.us

## កម្មវិធីពន្ធអចលនាទ្រព្យ/ឧបត្ថម្ភធន សម្រាប់ថ្លៃជួលផ្ទះ

សម្រាប់ព័តិមានបន្ថែម សូមទស្សនាវេប សាយ : http://www.revenue.state.pa.us

**Department of Revenue**
**Real Estate Tax**
**Municpal Services Building**
**1401 John F. Kennedy Boulevard**
**Philadelphia,PA 19102**
**215-686-6442**
**revenue@phika.gov**

Income Guidelings :

| Household Size | Gross Monthly Income |
|---|---|
| 1 | $1,396.00 |
| 2 | $1,891.00 |
| 3 | $2,386.00 |
| 4 | $2,881.00 |
| 5 | $3,376.00 |
| 6 | $3,871.00 |
| 7 | $4,366.00 |
| 8 | $4,861.00 |
| Each additional | $495.00 |

You must Submit the Documents Requested Below. Your Application will not be Accpted if documents are missing.

Examples of acceptable Income are:

a. Pay Stubs
b. Letter from employer stating gross and net amounts and pay frequency
c. Unemployment compensation award letter or statement
e. Court support order
f. SS or SSI award letter or printout
g. Pension income statement
h. Welfare determination letter or statement from caseworker
i. Signed and date letter from individual providing support

**2. SOCIAL SECURITY CARDS FOR EACH HOUSEHOLD MEMBER**
**3.PROOF OF CURRENTS MONTHLY HOUSEHOLD EXPENSES**
**(Food/clothing allowance is given)**

| Mortgage | Electric | Transportation |
|---|---|---|
| Gas | Oil | Medical ( Paid by you) |
| Rent | Telephone | Other (paid by you) |



*Continued From Page 09*

## Downtown Meets...

in Centralville and last Friday night a man was shot off Woburn Street, the investigation into the connections between all of the incidents remains active.

"We are pretty sure we are going to wrap this up pretty quickly," said Capt. Kevin Sullivan, who oversees the downtown.

Capt. William Taylor said late last summer a similar rash of violent crime broke out. When the investigations were completed it all tied back to a turf war between rival gangs engaged in the illegal distribution of marijuana. At one of the crime scenes, Taylor said, police stumbled upon $75,000 in cash.

Friedl added a large percentage of crime in the city including shootings, stabbings, robberies and home invasions can be traced back to marijuana distribution, a drug with a high profit margin and a plentiful supply.

The weekend following the fatal shooting, patrols were stepped up in the downtown.

LDNA President Kathleen Marcin said when she was walking home Sunday morning at 2:10 a.m. she saw eight officers on Market Street, four at the top of Central Street and more at the corner of Merrimack and Palmer Streets.

"Thursday and Friday night Middlesex Street was the safest street in the world," Sullivan said.

"It sends a great message, but people should realize there is no way to do that all the time," Marcin said.

Sullivan said the police work hard to employ strategy in determining where and when to locate officers. It's a balance between providing adequate coverage in the downtown and not leaving the other neighborhoods vulnerable.

He added it is imperative for residents to call the police when they see something suspicious or are aware of any problems.

The majority of the violence downtown, Sullivan said, is the combination of excessive alcohol consumption and aggression. Last weekend he was patrolling the downtown when he noticed a large group gathered at the intersection of Market and Central Streets.

"My first thought was -what are they doing? Dancing in the street?" Sullivan said.

When he got closer he realized five or six guys had one guy on the ground and he was being kicked in the face.

A witness later told him the group of assailants walked out of Hookslide Kelly's and she heard one of them say "let's go f*** someone up."

Another huge problem facing the city and mentioned by several downtown residents is aggressive panhandling by drug addicts and drug deals happening on the streets, particularly in the Appleton and Middlesex Street areas.



Residents who live in the Appleton Mills said drug deals are going down nightly on Canal Street and there is a lot of drug activity in the overgrown grassy area between the National Park parking lot on Dutton Street and the canal in front of Appleton Mills.

Sullivan said he would step up patrols, but also encouraged residents to call police and get license plates and descriptions of vehicles they suspect are involved in illegal activity.

Friedl said for the most part robberies, shoplifting and car breaks can all be tied back to addicts looking to fee their habit.

She added the police target drug dealers more than individual users to get the dealers of the street; if a user is arrested for possession of one or two bags of heroin, he or she will be arraigned at 10 a.m. the next morning and back on the street by noon, doing the same thing.

Contacting the Lowell Police has never been easier. For this portion, I will steal some information from my friend Rob Mills at the Sun's Police Line blog:

Anyone with information please call Lowell Police at 978.937.3200.

If you want to remain anonymous, you can call Crimestoppers at 978.459.TIPS (8477), or contact police via text message by texting to 847411, with "LPDtip" in the subject line of the text.

Tips can also be submitted anonymously at http://www.citizenobserver.com. Select "community" and then type in 01852 to select Lowell Police. Then select "submit a tip" and type in your information.

Those who provide anonymous information are still eligible to get a cash reward of up to $1,000 if their information leads to an arrest.

តមកពីទំព័រទី ៩ ប៉ូលីសជួបពិភាក្សានៅទីប្រជុំជន...

និងគាស់ផ្ទះក៏ចេះតែកើនឡើង។ ចំណុចទាំងអស់នេះជាបញ្ហាដែលប៉ូលិសមានសមត្ថកិច្ចត្រូវមានប្រតិកម្មចាត់វិធានការ ដូចមានរៀបរាប់ក្នុងអត្ថបទដើមជាភាសាអង់គ្លេសខាងក្រោម។

ប្រសិនបើមានពតិមានអំពីបញ្ហាសុវត្ថភាព សូមហៅមកកាន់ប៉ូលីសឡូវែលដែលមានលេខទូរស័ព្ទ ៩៧៨ ៩៣៧ ៣២០០

បើលោកអ្នកមានបំណងរក្សាឬមិនចង់បង្ហាញអត្តសញ្ញាណសូមហៅមកកាន់លេខក្រៃមស្តុបភី ៩៧៨ ៤៥៩ TIPS(8477) ឬផ្ញើសារមកកាន់លេខ៨៤៧៤១១

ឬអាចផ្ញើព័តិមានអនាមិកតាមគេហទំព័រ http://www.citizenobserver.com

រាល់អ្នកដែលផ្តល់ព័តិមានមានឱកាសទទួលបានលុយសុទ្ធអាចរហូតដល់ទៅ១000ដុល្លារ បើព័តិមាននោះជួយឱ្យឈានទៅដល់ការចាប់ខ្លួន។

## តមកពីទំព័រទី ១៩ សហគ្រិនជុំវិញតំបន់ឡូវែលរួមគ្នាទទួល...

ខ្ញុំមានជំនឿចិត្តមោះមុតក្នុងការសម្រេចគម្រោងជំនួញរបស់ខ្ញុំឱ្យចេញជារូបរាងឡើង។ ខ្ញុំក្លាយជាមនុស្សដែលរឹងមាំនិងជឿជាក់លើខ្លួនឯងខ្លាំងជាងមុន។

ឡាក់គី ហិនរី រង្វាន់ ៣០០០ដុល្លារ

ម៉ាស្យា ស្រ្តស់ ទទួលបានទីកន្លែងមួយបន្ទប់នៅសេនបក្សសម្រាប់រយៈពេល៦ខែ



រាប់ថយក្រោយ១១សប្តាហ៍កន្លងទៅសហគ្រិនថ្មីថ្មោង១៦ស្ថិតនៅក្នុងចំណាប់ផ្តើមនៃការប្រកួតសេនបក្សរដូវក្តៅឆ្នាំ២០១៣នេះ។ សហគ្រិនទាំងអស់នេះបានវិវត្តជំនួញរបស់ពួកគេ និងកម្មវិធីមិនគិតពីប្រាក់ចំណេញតាមរយៈសិក្ខាសាលាការណែនាំពីគ្រូបង្គោលចន្លោះទំនេរសម្រាប់ធ្វើជំនួញ និងលុយជំនួយ។ មួយភាគធំកម្មវិធីសេនបក្សដើរតួនាទីសំខាន់ក្នុងការជំនួញរបស់សហគ្រិនទាំងឡាយ។ បីខែកន្លងទៅអ្នកដឹកនាំតូចតាចមានត្រឹមជាគំនិតនេះជាប្រសាសន៍របស៍រីវៀ អ្នកនៅឡរិន (Lawrence)។ តាមរយៈសំទុះនៃជំនួញសម្រាប់ក្រុមវិភាគមែរីម៉ាក(Merrimack Analysis Group) ការចូលរួមក្នុងភាពជាសហគ្រិនថ្មីថ្មោងនាំឱ្យមានកំនើនអតិថិជនយ៉ាងសន្ធឹកសន្ធាប់។ ដូចនេះមិនមានអ្វីជាចម្ងល់ឡើយថា ហេតុអ្វីបានជាជំនួញរបស់រំកិលទៅលំដាប់ខ្ពស់មួយកម្រិតទៀត។



បញ្ជីឈ្មោះជ័យលាភីចុងក្រោយក្នុងចំណោមគូប្រកួតទាំង១៦រូប ដែលបានចូលរួមប្រកួតប្រជែងក្នុងកម្មវិធីវិធីសេនបក្សរដូវក្តៅរួមមាន:

**ជ័យលាភី :**

អេរីន ហ្វ្រីបន រង្វាន់ ៨០០០ដុល្លារ
មីណូ រង្វាន់ ៦០០០ ដុល្លារ
ឡេសលី រីវៀរ រង្វាន់ ៥០០០ ដុល្លារ
រ៉ូណាល អេរ៉ូត រង្វាន់ ៥០០០ដុល្លារ
ប្រេដ ឌឺប៊ីន រង្វាន់ ៥០០០ដុល្លារ
គ្រិក ផេច រង្វាន់ ៣០០០ដុល្លារ

**បេក្ខជនចុងក្រោយ :**

អាម៉ាកាក់ អូកូរ៉ុនកូ
ឌីរ៉េក ដាមភ័ស៊ី
ដាយអិន អ៊ីវ៉ៃយ៍
ម៉ាគូស ហាឡា
អាំស៊ី ម៉ូរ៉ែល
ហ្វីលីប ខូលែនចែឡូ
ឆវី ស៊ីនួន
សម ហ៊ី

## Lowell Entrepreneurs Share $30K Prize...

Out of 16 Finalists here are the top winners in the Sandbox Summer Accelerator program:

**Awarded Winners:**

- Juvenile Court Restorative Justice Diversion (JCRJD) - Erin Freeborn $8,000
- mino by ParaWare, LLC - aaronburke,Russ Queen $6,000
- Little Leaders - Leslie Rivera $5,000
- i4class LLC - Ronald Ayotte $5,000
- Ubersimple – Brad Durbin $5,000
- Merrimack Analysis Group - Greg Page $3,000
- CollegePower Inc - Lucky Henry $3,000
- Lowell Naturalization and Citizenship Services - Marcia Strauss - Access to Sandbox Space for 6 months

**Finalists**

- Jumply – Amaka Okoronkwo
- HPT Engineering - Derek Dempsey,AnthonyCapone,Justin Patel
- Lady Dye Yarn - Diane Ivey
- MHM Studios Printmaking - Markus Haala
- Principium Prep - Amsi Morales
- Robotic Feeding Arm - Philip Colangelo
- Style This Shindig - Chhavy Sinuon*
- The Medallion Movement- Sam Hy*

The Sandbox Accelerator takes place twice a year and is open to entrepreneurs with any business or non-profit idea. The deadline for the Winter Accelerator is October 31st, 2012. For more information, please visit: MVSandbox.org

## តមកពីទំព័រទី ១ សង្គ្រោះជាតិ : ហឹង្សាជាអំពើល្ងង់ខ្លៅ...

ដោយសារបាតុកម្មអហឹង្សានេះ - នៅមានព្រឹត្តិការណ៍ធំមួយទៀត គឺ ម៉ាតាំង លូទ័រឃីង បានធ្វើដំណើរដោយជើងរាប់ម៉ឺនមាយល៍ប្រមូលអាមេរិកាំងស្បែកខ្មៅរាប់សែននាក់មកធ្វើបាតុកម្មអហឹង្សាទាមទារសិទ្ធិស្មើគ្នារបស់ជនស្បែកខ្មៅនៅរដ្ឋធានីវ៉ាស៊ីនតុនចុងបញ្ចប់អាមេរិកាំងស្បែកខ្មៅទី១ បារ៉ាក់ អូបាម៉ា បានមកកាន់ដំណែងដ៏ខ្ពង់ខ្ពស់បំផុត គឺជាប្រធានាធិបតីនៃស.រ.អា. ដូចអាមេរិកាំងស្បែកសបានដែរ ដែលជាគុណសម្បត្តិនៃបាតុកម្មអហឹង្សានោះឯង។

ថ្ងៃទី៧កញ្ញា ២០១៣ សម រង្ស៊ី-កឹម សុខា មេដឹកនាំចលនាបាតុកម្ម"ប្រឈមមុខ" បានប្តូរយុទ្ធសាស្រ្តជាបាតុកម្ម"អហឹង្សា"ជាមួយមនុស្សច្រើនជាង២០.០០០ដែលរីករាយដែលមានសណ្តាប់ធ្នាប់ដែលជឿជាក់លើមេដឹកនាំថ្មីរបស់ខ្លួន គឺដំបូងបង្អស់ឱ្យសញ្ញាថា គណបក្សប្រជាជនបានបាត់បង់ប្រជាជនរបស់ខ្លួនអស់ទៅហើយ នៅសល់តែការដណ្តើមទីនឹងអំណាចគ្រប់គ្រងកម្ពុជាដោយគ្មានចង់ឃើញការពន្លឺនៃយុត្តិធម៌ទាល់តែសោះ។ គេបានសង្កេតឃើញគណបក្សសង្គ្រោះជាតិមានការប្រុងប្រយ័ត្នខ្ពស់មិនឱយភ្លាត់ចូលអន្ទាក់ហឹង្សារបស់អាជ្ញាធរគណបក្សប្រជាជនដែលខិតខំបង្កហេតុឱ្យមានភាពរងគ្រោះយ៉ាងឥតប្រយោជន៍នោះទេ "តែផ្ទុយទៅវិញ ប្រជាពលរដ្ឋបានជឿថា ហ៊ុន សែន មិនហ៊ានប្រឈមមុខនឹងភាពសុច្ចរិត រដ្ឋអំណាច ហ៊ុន សែន គ្មានប្រជារាស្រ្តគាំទ្រប្រជាជាតិធ្វើបាតុកម្មអហឹង្សាដោយគ្មានខ្លបខ្លាចនឹងប្តូរជីវិត ពីក្រោយមេដឹកនាំដែលខ្លួនបានជ្រើសរើសដោយគ្មានមន្ទិលសង្ស័យ។ ក្នុងជំហានទី១នេះ គេអាចវាស់បានថា "ជំនឿលើៈ គណបក្សប្រជាជនក្រុមប្រឹក្សាធម្មនុញ្ញ គ.ជ.ប.បានថយចុះយ៉ាងច្រើន"រីឯ "ជំនឿលើៈ គណបក្សសង្គ្រោះជាតិបានឡើងខ្លាំងជាកម្លាំងជាតិ" គឺកម្លាំងចុងក្រោយនេះហើយដែលអ្នកនយោបាយសេរីត្រូវការសម្រាប់ដឹកនាំប្រជាជាតិទៅរកភាពរុងរឿងទៅបាន រីឯគណបក្សប្រជាជននឹងចុះខ្សោយទៅៗ រហូតរលាយខ្លួនដោយខ្លួនឯងជាមិនខាន។

អ្នកបង្ហាត់បង្ហាញពីគំរូអហឹង្សានេះ គឺព្រះសមនគោត្តមដែលតាំងពី២៥០០ឆ្នាំមុនរមែងបង្រ្កាបជនឃោឃៅប្រកបដោយជោគជ័យយូរអង្វែងការរម្ងាប់ចិត្តមិនចងពៀរការធ្វើចិត្តឱ្យជ្រះថ្លា មានមេត្តា ករុណា ឧបេក្ខា មិនត្រឹមតែជាកម្លាំងកាយនឹងចិត្តដ៏រឹងមាំផ្ទាល់ខ្លួនតែប៉ុណ្ណោះទេ តែជាចំណងផ្ជាប់ទាក់ទងមិត្តភាពបរិសុទ្ធទៅមនុស្សគ្រប់ស្រទាប់ជាកម្លាំងសង្គមធម៌ដកខ្លួនពីការគាំទ្រអំពើអយុត្តិធម៌អមនុស្សធម៌បានដោយមិនច្រឡំ។ សម រង្ស៊ី នឹង កឹម សុខា នឹងសមាជិកជាន់ខ្ពស់គណបក្សសង្គ្រោះជាតិមួយចំនួនដែលធ្លាប់បានចូលសិក្សាក្រោមម្លប់ព្រះធម្ម តាមរយៈសាងព្រះផ្នួស ឬធ្វើវិបស្សនាភាវនាកម្មដ្ឋានបានយកចំណេះនេះមកប្រើជាដំណោះស្រាយបញ្ហាសង្គមកម្ពុជា តាមរយៈការផ្លាស់ប្តូរសំពាតផ្លូវចិត្តយក"បញ្ញា"ទៅទប់ទល់ "តណ្ហា" ប្រភពនៃការភ្លើតភ្លើននឹងភាពល្ងង់ខ្លៅ។ វិធីនេះបានចាប់ផ្តើមពុំទាន់ដឹងពីលទ្ធផលនៅឡើយថា នឹងមានកម្លាំងប៉ុណ្ណា? មានតែការព្យាយាមប្រកបដោយភាពលះបង់នឹងជំនឿដ៏មុតមាំទៅលើសីលធម៌តទៅទៀតទេ ទើបអាផ្ចាញ់មារប្រកបដោយប្រសិទ្ធភាពបាន៕

# ជំងឺមហារីក: ចូរចងចាំក្បួនដ៏សំខាន់នេះ



១-កុំប្រើចានជ័រ (ប្លាស្ទិក) សំរាប់កំដៅម្ហូបក្នុងម៉ាយក្រូវ៉េវ

២-កុំប្រើដបជ័យដាក់ទឹកឱ្យកកក្នុងទូរកក

៣-កុំប្រើស្បោងប្លាស្ទិកក្នុងម៉ាយក្រូវ៉េវ

មន្ទីរពេទ្យជនហបគិនទើបតែបញ្ចេញថ្មីៗនូវដំណឹងទាំងនេះក្នុងទស្សនាវដ្តីរបស់ខ្លួន ។ គេក៏បានប្រទះឃើញដំណឹងនេះចុះក្នុងទស្សនាវដ្តីឈ្មោះ Walter Reed Army Medical Center ផងដែរ ។ គេជូនដំណឹងថា "ដាយអុកស៊ីត"=Dioxin ជាជាតិគីមីបណ្តាលឱ្យកើតជំងឺមហារីក ពិសេសមហារីកដោះ ។ ដាយអុកស៊ីនជាជាតិគីមីពុលដ៏សាហាវចំពោះកោសិកានៃខ្លួនយើង ។ ចូរកុំដាក់ដបទឹក(ធ្វើពីប្លាស្ទិក) ទៅក្នុងទូទឹកកកឱ្យសោះ ព្រោះដបប្លាស្ទិកទាំងនេះនឹងបញ្ចេញជាតិពុលដាយអុកស៊ីតមកក្នុងទឹក ។ ថ្មីៗនេះវេជ្ជបណ្ឌិត Dr.Edward Fujimoto អ្នកគ្រប់គ្រងកម្មវិធីសុខុមាលភាពនៃមន្ទីរពេទ្យឈ្មោះ Castle Hospital បានធ្វើអត្ថាធិប្បាយតាមទូរទស្សន៍អំពីគ្រោះថ្នាក់បណ្តាលមកពីរឿងនេះផងដែរ ។ លោកបានធ្វើអត្ថាធិប្បាយអំពីដាយអុកស៊ីតនឹងផលវិបាកយ៉ាងចង្រៃរបស់វា ចំពោះមនុស្សយើង។ លោកបានរំលឹកថា យើងមិនគួរកំដៅម្ហូបចំណីដាក់ក្នុងចានជ័រដោយម៉ាយក្រូវ៉េវឡើយ ។ បំរាមនេះអនុវត្តន៍ត្រូវបំផុត ចំពោះចំណីអាហារដែលប្រកបច្រើនទៅដោយជាតិខ្លាញ់។ លោកបញ្ជាក់ថា : ខ្លាញ់ បូកនឹងកត្តាកំដៅខ្លាំងបណ្តាលឱ្យប្លាស្ទិកបញ្ចេញមកជាជាតិដាយអុកស៊ិនចូលទៅក្នុងម្ហូបចំណី, ទីបំផុតគឺចូលដល់ថ្នក់កោសិកានៃរាងកាយនេះឯង ។ ជាជំនួសលោកឱ្យប្រើភាជដាក់ម្ហូបធ្វើពី សេរ៉ាមិច ពីជាតិកែវដូចជា Corming Ware, Pyrex,... ប្រើភាជទាំងនេះទទួលបានលទ្ធផល ដូចគ្នាតែល្អត្រង់គ្មានជាតិដាយអុកស៊ិន ។ កម្មវិធីទូរទស្សន៍នាអាហារពេលល្ងាចរំលឹកថា អាហារឆ្អិនស្រាប់ដូចជា សម្លដែលដាក់ក្នុងស្បោង ប្លាស្ទិកទិញយកមកផ្ទះគួរតែផ្ទេរចេញដាក់ក្នុងចានផ្សេង (មិនមែនប្លាស្ទិក) ហើយទើបកំដៅវា ។ ថង់ក្រដាសក៏អាចប្រើបានដែរ តែវាលំបាកមើលឃើញរបស់អីដែលដាក់ក្នុងនោះ ។ លោកវេជ្ជបណ្ឌិតបានបញ្ជាក់យើងថា វាមានសុវត្ថិភាពបំផុត គឺត្រូវប្រើចានធ្វើពីកែវ (ឬចានថ្ម) នេះជាហេតុផលដែលយើងធ្លាប់ឃើញនៅមុនពេលនេះបន្តិចគេច្រើនដាក់អាហារឆ្អិនស្រាប់ក្នុងកញ្ចប់ក្រដាស់ជាជំនួសប្រអប់ស្នោរទៅវិញ។ រឿងនេះបណ្តាលមកពីបញ្ហាដាយអុកស៊ិន វាជាហេតុផលមួយក្នុងចំណោមហេតុផលទាំងឡាយ ។

លោកវេជ្ជបណ្ឌិតបានបញ្ជាក់បន្ថែមទៀតថា ក្រដាស់ប្លាស្ទិកសម្រាប់គ្របពីលើម្ហូបអាហារ ដូចជា Saram ជាដើមពេលយកទៅកំដៅក្នុងម៉ាយក្រូវ៉េវ វានឹងក្លាយជាមានគ្រោះថ្នាក់យ៉ាងខ្លាំងក្លាបំផុត ។ ព្រោះម្ហូបកំដៅបានក្លាយជាជាតិពុលមកពីប្លាស្ទិកនោះរលាយស្រក់ចូលទៅពីលើវា ។ ហេតុនេះគួរតែប្រើក្រដាស់ជូតដៃ(Paper Towel) គ្របម្ហូបចំណីជំនួសវិញ ។

នេះជាអត្ថបទមួយគួរតែបានចម្លងចែកជូនទៅចំពោះមនុស្សគ្រប់រូបជាទីស្រលាញ់របស់យើងគ្រប់ៗគ្នា ។

ចប់ដោយសង្ខេប (បកប្រែក្រៅផ្លូវការ)

គីម ភឿន

## តមកពីទំព័រទី ៣១ អ្នកក្រ និងអ្នកមាន

គោរពចាស់មុន និងអ្នកក្រត្រូវគោរពអ្នកមានមុននេះជាដើម។ យើងត្រូវផ្លាស់វប្បធម៌នេះ។ យើងត្រូវដឹងថា អ្នកក្រអ្នកតូចនឹងសប្បាយណាស់ជាឧទាហរណ៍ បើកាលណាបានអ្នកធំអ្នកមានចាប់ផ្តើមនិយាយរកខ្លួនមុន។ ហើយនៅទីបំផុតអ្នកមាននឹងទទួលការគោរពពីអ្នកក្រវិញលើសលុបមិនខាន។

### ប្រជាប្រិយភាពគណបក្សប្រជាជនធ្លាក់

ប្រទេសខ្មែរចាប់មានការផ្លាស់ផ្តូរហើយ។ ការបោះឆ្នោតជាតិនៅថ្ងៃទី២៨ខែកក្កដាបង្ហាញឱ្យឃើញចរន្តនេះយ៉ាងច្បាស់។ យើងឃើញហើយថា អ្នកបោះឆ្នោតភាគច្រើនមិនបោះឱ្យគណបក្សប្រជាជនទេ។ តាមការវិភាគមូលហេតុមួយក្នុងចំណោមមូលហេតុឯទៀតដែលធ្វើឱ្យអ្នកបោះឆ្នោតមិនបោះឱ្យគណបក្សប្រជាជន គឺមកពីអ្នកមានភាគច្រើននៅក្នុងគណបក្សប្រជាជននេះមិនគ្រាន់តែមិនបានជួយអ្នកក្រឱ្យផុតពីភាពក្រីក្រតែប៉ុណ្ណោះទេ ថែមទាំងធ្វើទុក្ខបុកម្នេញដល់អ្នកទាំងនោះទៀតផង។ ត្រង់នេះយើងអាចយកករណីបឹងកក់និងបុរីកីឡាជាដើមមកធ្វើជាឧទាហរណ៍។

### ឈប់ធ្វើគុកដាក់ខ្លួនឯង

ដូច្នេះអ្នកមានត្រូវក្រោកឡើង ជួយអ្នកក្រឱ្យផុតពីភាពក្រីក្រ។ ត្រូវឈប់សង់កំពែងគុក។ សព្វថ្ងៃវិញផ្ទះរបស់អ្នកមាននៅភ្នំពេញមានកំពែងកាន់តែខ្ពស់ឡើង ខ្ពស់ឡើង ហើយមាំឡើងមាំឡើង។ កំពែងទាំងនោះមើលទៅហាក់ដូចជាកំពែងគុក ។ នេះនាំឱ្យគិតថា អ្នកមានទាំងនោះកំពុងធ្វើគុកដាក់ខ្លួនឯង។ ដូច្នេះគួរគិតថា បើយកលុយសម្រាប់ធ្វើកំពែងនោះទៅបង្កើតការងារឱ្យអ្នកក្រធ្វើនឹងមានប្រយោជន៍ជាង។ កាលណាមានការធ្វើ អ្នកទាំងនោះមុខជាអរគុណដល់អ្នកមាន ហើយជួយការពារអ្នកមាននោះជំនួសកំពែងនោះ។ នេះមានន័យថា អ្នកមានជួយខ្លួនឯងឱ្យមានសន្តិសុខសុវត្ថិភាពហើយនឹងជួយស្រុកឱ្យបានចម្រើនលូតលាស់៕

# វិស្វកម្មក្នុងចិត្តមនុស្ស
# The human inner engineering

តពីលេខមុន


និពន្ធដោយ : ម៉ៅ ច័ន្ទសំណុំ

មានដល់រូបគាត់ ពីព្រោះគាត់នៅរស់ក្នុងប្រព័ន្ធរូបកាយ និងចិត្តនៅឡើយ ។ ចុះតើគាត់ខុសប្លែកពីជនសាមញ្ញ ដូចម្តេចដែរ ? គាត់មានសតិដឹងថា អាត្មាអញកំពុងកើតទុក្ខក្រៀមក្រំ ។ គាត់ពុំមែនជាទុក្ខក្រៀមក្រំនោះឡើយ ។ គាត់មានសមត្ថភាពអាចពិនិត្យបាតុភូតទុក្ខក្រៀមក្រំពីក្នុងខ្លួនមក។ ទុក្ខក្រៀមក្រំជាឋាមពលអវិជ្ជមានដែលឧបដឹកកើតឡើងក្នុងប្រព័ន្ធរូបកាយ និងចិត្តមនុស្ស ។ អ្នកត្រាស់ដឹងស្គាល់ច្បាប់ធម្មជាតិទុក្ខក្រៀមក្រំនេះ លោកគ្រាន់តែមានសតិដឹងបើកចំហរ និងស្វាគមន៍ទុក្ខកន្លែងឱ្យទុក្ខក្រៀមក្រំនេះគេមានឱកាស និងបញ្ចេញផ្លែផ្កា និងចាក់ក្បាច់ក្នុងប្រព័ន្ធកាយ និងចិត្តគេចាកចេញជារៀងកាយនេះជារៀងរហូត ពុំបានបន្សល់ទុកស្នាកស្នាមអ្វីឡើយ ។ ទុក្ខក្រៀមក្រំវាផុសឡើងតាមដំណើរធម្មជាតិ ហើយវារលាយបាត់ទៅមួយរំពេចដោយអំណាចនៃសតិដឹងនេះ ខ្ញុំសូមបញ្ជាក់នូវពាក្យគន្លឹះ "បើកចំហរ និងស្វាគមន៍" នោះមានន័យថា ចំពោះមុខឋាមពលទុក្ខក្រៀមក្រំនេះគាត់បញ្ឈប់សកម្មភាពអ្វីៗទាំងអស់គាត់នៅស្ងៀម (Being Still) គាត់ពុំប្រតិកម្មគាត់ពុំពិចារណារកខុសត្រូវគាត់ពុំរុញច្រានចេញ ឬស្រូបយកឡើយ ។ លោកស្វាគមន៍មានន័យថា លាដៃទទួលយកតាមធម្មជាតិ (Acceptance)។ បើស្វាគមន៍សង្គ្រាមក្នុងចិត្តត្រូវបញ្ឈប់នោះប្រៀបដូចជាឋាមពលពន្លឺ ចលនាឆ្លងកាត់កញ្ចក់ដ៏ភ្លឺថ្លាគ្មានបន្សល់ស្លាកស្នាមអ្វីឡើយ ។ បើពុំស្វាគមន៍សង្គ្រាមក្នុងចិត្ត និងបន្តជាប់ស្អិតនោះប្រៀបដូចជាឋាមពលពន្លឺឆ្លងកាត់កញ្ចក់ដ៏ស្រអាប់រារាំងហើយបង្កើតជាកំដៅដោយវាឆ្លងចេញពុំរួច ។ ដោយប្រកាន់ ឥរិយាបថ បើកចំហរ និងស្វាគមន៍លោកអ្នកត្រាស់ដឹងបានរួចរំដោះពីទុក្ខក្រៀមក្រំទាំងស្រុង នេះគឺជាពន្លឺព្រះនិពាន្វដែលមនុស្សអាចពិសោធន៍ក្នុងរូបកាយនេះ ។

**ផលប្រយោជន៍នៃការមានសតិដឹង**

១-ការដែលមនុស្សដឹងមានសតិដឹងលើរូបកាយមានសតិដឹងអំពីវេទនាលើរូបកាយមានសតិដឹងអំពីចលនាលំហូរគំនិត អំពីអារម្មណ៍នានាអំពីមនោសញ្ចេតនានានា (កំហឹងព្រួយភ័យទុក្ខក្រៀមក្រំ) អំពីការប្រតិកម្មក្នុងចិត្ត ។ល។ នោះមានន័យថា មនុស្សយើងអាចមើលឃើញការប្រតិកម្មក្នុងចិត្ត ។ មនុស្សពិតជាអាចមើលឃើញរូបកាយ ប៉ុន្តែរូបកាយនេះពុំអាចមើលឃើញមនុស្សយើងឡើយ ។ មនុស្សពិតជាមើលឃើញលំហូរគំនិត ប៉ុន្តែលំហូរគំនិតទាំងនោះពុំអាចមើលឃើញមនុស្សយើងឡើយ ។ ដូច្នេះមានន័យម្យ៉ាងទៀតថា យើងជាមនុស្សនេះ ពុំមែនជារូបកាយនេះទេ ។ យើងជាមនុស្សនេះពុំមែនជាអារម្មណ៍នេះទេ ពុំមែនជាចិត្តនេះទេ ពុំមែនជាកំហឹងនេះទេ ពុំមែនជាលំហូរគំនិតទាំងនោះឡើយ ពុំមែនជាការប្រតិកម្មក្នុងចិត្តឡើយ ។ តើមនុស្សយើងជានរណា? មនុស្សយើងជាអ្នកមើលពីក្នុងខ្លួនមក (The Seer) មនុស្សយើងនេះ គឺជាសតិដឹងជាចិត្តបរិសុទ្ធដែលជាធម្មជាតិពិតរបស់មនុស្សគ្រប់រូប ។ ជនណាដែលស្គាល់រូបខ្លួនឯងនេះហើយ គេជាមនុស្សទំនើបគេជាអ្នកត្រាស់ដឹងគេជាអ្នករួចរំដោះពីអពមង្គលសព្វយ៉ាងក្នុងលោកយើងនេះ ។

២-បើអ្នកដឹងខ្លួនថា អាត្មាអញកំពុងតែខឹង អ្នកមានសតិដឹងក្នុងខ្លួនហើយ ពេលនោះផ្ទៃចិត្តអ្នកមានធាតុពីរយ៉ាងកើតឡើង នោះគឺអ្នកមើលពីក្នុងមក និងកំហឹង ។ ដូច្នេះកំហឹង និងរូបអ្នកផ្ទាល់ត្រូវបានបំបែក ឬញែកចេញពីគ្នាយ៉ាងពិតប្រាកដ ។ សតិដឹងនេះ គឺជារូបអ្នកពិតប្រាកដចំណែកឯកំហឹងជាអង្គភាពដោយឡែកជារបស់មួយដោយឡែក ។ ពេលនេះកំហឹងហើយ (Separation from the anger) ។ អ្នកបានរួចរំដោះអំពីអកុសលចិត្តកំហឹងភ្លាមៗអស្ចារ្យណាស់នេះជាពិសោធន៍ព្រះនិពាន្វក្នុងរូបកាយមនុស្សពិតប្រាកដ ។

រូបកាយរបស់មនុស្សយើងនេះ បានក្លាយជាមន្ទីរពិសោធន៍ព្រះនិពាន្វទៅជាឡាបូពិសោធន៍ព្រះនិពាន្វ មនុស្សរកឃើញបញ្ញាដ៏ខ្ពង់ខ្ពស់បញ្ញាដ៏ឧត្តុង្គឧត្តមនេះជាខ្លឹមសារនៃការត្រាស់ដឹងរបស់ព្រះពុទ្ធ តើអ្នកជ្រាបឬទេ? ដូច្នេះសកម្មភាពមើលឃើញពីក្នុងខ្លួនមក (Seeing from inside ) ពិតជាបង្កប់អត្ថន័យយ៉ាងជ្រាលជ្រៅក្នុងដំណើរស្វែងរកការរួចរំដោះសេរីភាពផ្លូវចិត្តនេះ ។ ចំណុចនេះជាគន្លឹះកូនសោរសំរាប់ចាក់ចូលទៅក្នុងបន្ទប់អាថិកំបាំងក្នុងខ្លួនមនុស្សក្នុងចិត្តមនុស្ស ។ ការប្រតិបត្តិព្រះធម៌ព្រះពុទ្ធសាសនាទាំងអស់មានទិសដៅដឹកនាំអ្នកកាន់សាសនាបានសម្រេចព្រះនិពាន្វក្នុងខ្លួននេះ ក្នុងជាតិជាមនុស្សនេះ ពុំចាំបាច់រង់ចាំដល់ជាតិណាៗឡើយ ។

ចំពោះមនុស្សសាមញ្ញ បើកំហឹងផុសឡើងខ្លួនគេរូបគេ តទៅលេខក្រោយ

## *Contiued From Page 01* Lowell Preliminary...

councilors for the next two years will be chosen.

For elections, the city of Lowell is divided into eleven districts called "wards." Each ward is divided into three "precincts." Where you live determines which precinct you are in. Your precinct is where you vote. If you have questions about voting, call the Lowell Election Commission at 978/674-1197.

The current precinct boundaries were set in 2011 as a result of the 2010 Federal Census. The precincts must be evenly divided based on population with each containing approximately 3,228 residents with a margin of error of plus or minus 5% (between 3,067 and 3,389 people). The number of registered voters within each precincts varies considerably based on a number of factors such as percentage of children, non-citizens, and non-participants in the political process.

The table that accompanies this article contains the following information:

Column 1: "W-P" is the ward and precinct

Column 2: "Tot-Reg" is the number of registered voters in that precinct

Column 3: "%-Reg" is the percentage of all people in the precinct who are registered to vote

Column 4: "SEA names" is the number of voters in that precinct who have Southeast Asian names

Column 5: "%-SEA" is the percentage of voters in that precinct who have Southeast Asian names

Column 6: "Voting Location" is the place where people in that precinct go to vote.



| | A | B | C | D | E | F |
|---|---|---|---|---|---|---|
| 1 | W-P | Tot-Reg | %-Reg | SEA-names | %-SEA | Voting Location |
| 2 | 1-1 | 1540 | 49% | 110 | 7% | High St Firehouse |
| 3 | 1-2 | 2435 | 79% | 49 | 2% | Reilly School, Douglas Rd |
| 4 | 1-3 | 2285 | 74% | 41 | 2% | Reilly School, Douglas Rd |
| 5 | 2-1 | 1221 | 36% | 86 | 7% | Tsongas Center, Martin Luther King Way |
| 6 | 2-2 | 1760 | 53% | 203 | 12% | Tsongas Center, Martin Luther King Way |
| 7 | 2-3 | 1944 | 63% | 47 | 2% | Tsongas Center, Martin Luther King Way |
| 8 | 3-1 | 1518 | 48% | 187 | 12% | Bailey School, Campbell Dr |
| 9 | 3-2 | 1390 | 44% | 458 | 33% | Bailey School, Campbell Dr |
| 10 | 3-3 | 1422 | 46% | 474 | 33% | Morey School, Pine St |
| 11 | 4-1 | 1730 | 51% | 602 | 35% | Morey School, Pine St |
| 12 | 4-2 | 1279 | 42% | 520 | 41% | VFW Hall, Plain St |
| 13 | 4-3 | 1629 | 53% | 377 | 23% | Rogers School, Highland St |
| 14 | 5-1 | 1618 | 48% | 72 | 4% | McAvinnue School, Mammoth Rd |
| 15 | 5-2 | 1433 | 43% | 122 | 9% | Polish-American Vets, Coburn St |
| 16 | 5-3 | 1833 | 54% | 94 | 5% | Greenhalge School, Ennell St |
| 17 | 6-1 | 1960 | 58% | 103 | 5% | McAvinnue School, Mammoth Rd |
| 18 | 6-2 | 2073 | 63% | 98 | 5% | Pawtucketville Memorial School, W. Meadow Rd |
| 19 | 6-3 | 1924 | 58% | 89 | 5% | Elks Club, Old Ferry Rd |
| 20 | 7-1 | 1416 | 42% | 243 | 17% | Senior Center, Broadway |
| 21 | 7-2 | 1516 | 46% | 379 | 25% | Senior Center, Broadway |
| 22 | 7-3 | 1243 | 39% | 597 | 48% | Senior Center, Broadway |
| 23 | 8-1 | 1504 | 45% | 179 | 12% | Pine St Firehouse |
| 24 | 8-2 | 1815 | 55% | 462 | 25% | Daley School, Fleming St |
| 25 | 8-3 | 2162 | 69% | 252 | 12% | Daley School, Fleming St |
| 26 | 9-1 | 1684 | 51% | 81 | 5% | Polish-American Vets, Coburn St |
| 27 | 9-2 | 1941 | 59% | 105 | 5% | Robinson School, June St |
| 28 | 9-3 | 1726 | 52% | 86 | 5% | Robinson School, June St |
| 29 | 10-1 | 1590 | 51% | 249 | 16% | VFW Hall, Plain St |
| 30 | 10-2 | 1170 | 38% | 142 | 12% | Lawrence St Firehouse |
| 31 | 10-3 | 1160 | 38% | 131 | 11% | St Anthony's Hall, Central St |
| 32 | 11-1 | 1551 | 50% | 215 | 14% | Shaughnessy School, Gorham St |
| 33 | 11-2 | 1780 | 54% | 102 | 6% | J G Pyne School, Boylston St |
| 34 | 11-3 | 1703 | 54% | 83 | 5% | J G Pyne School, Boylston St |
| 35 | | | | | | |
| 36 | Total | 54955 | | 7038 | 13% | |

### Lowell Election Wards and Precincts

POLLING LOCATIONS

WARD ONE
Precinct 1 Firehouse, High St
Precinct 2 Reilly School, 115 Douglas Rd.
Precinct 3 Reilly School, 115 Douglas Rd.

WARD TWO
Precinct 1 Masonic Center, 79 Dutton St.
Precinct 2 Masonic Center, 79 Dutton St.
Precinct 3 Masonic Center, 79 Dutton St.

WARD THREE
Precinct 1 Bailey School, 175 Campbell Dr.
Precinct 2 Bailey School, 175 Campbell Dr.
Precinct 3 Morey School, 114 Pine St.

WARD FOUR
Precinct 1 Morey School, 114 Pine St.
Precinct 2 Veteran's of Foreign Wars, 190 Plain St.
Precinct 3 Rogers School, 43 Highland St.

WARD FIVE
Precinct 1 McAvinnue School, 117 Mammoth Rd.
Precinct 2 Polish American Vets Hall, 201 Coburn St.
Precinct 3 Greenhalge School, 149 Ennell St.

WARD SIX
Precinct 1 McAvinnue School, 117 Mammoth Rd.
Precinct 2 Dr. An Wang School, W. Meadow Rd.
Precinct 3 Lowell Lodge of Elks, Old Ferry Rd.

WARD SEVEN
Precinct 1 Council on Aging, 276 Broadway St.
Precinct 2 Council on Aging, 276 Broadway St.
Precinct 3 Council on Aging, 276 Broadway St.

WARD EIGHT
Precinct 1 Firehouse, Pine St.
Precinct 2 James Daley School, 150 Fleming St.
Precinct 3 James Daley School, 150 Fleming St.

WARD NINE
Precinct 1 Polish American Vets Hall, 201 Coburn St.
Precinct 2 Robinson School, 110 June St.
Precinct 3 Robinson School, 110 June St.

WARD TEN
Precinct 1 Veteran's of Foreign Wars, 190 Plain St.
Precinct 2 Firehouse, Lawrence St.
Precinct 3 St. Anthony's Parish Hall, 920 Central St.

WARD ELEVEN
Precinct 1 Shaughnessy School, 1170 Gorham St.
Precinct 2 J.G. Pyne School, off Boylston St.
Precinct 3 J.G. Pyne School, off Boylston St.

POLLING LOCATIONS

1- Rogers School
2- St. Anthony's Parish Hall
3- Council on Aging
4- Masonic Center
5- Greenhalge School
6- Polish American Vets Hall
7- Robinson School
8- High St. Fire Station
9- McAvinnue School
10- Pine St. Fire Station
11- Morey School
12- Lowell Elks
13 Wang School
14- Dailey School
15- VFW Hall
16- Shaughnessy School
17- J.G.Pyne School
18- Reilly School
19- Bailey International
20- Lawrence St. Fire Station




# ជោគជតារាសីលោកអ្នក ទាំង១២ប្រចាំឆ្នាំរោង

**ឆ្នាំជូត** នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះ ក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិនិងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើ តែហាមកុំជួញដូរផ្លូវឆ្ងាញប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

**ឆ្នាំឆ្លូវ** អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក៏គួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

**ឆ្នាំខាល** លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕

**ឆ្នាំថោះ** លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

**ឆ្នាំរោង** លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

**ឆ្នាំម្សាញ់** រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗនាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀប ដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

**ឆ្នាំមមី** រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែម ទើបជាការប្រសើរ ៕

**ឆ្នាំមមែ** រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះសូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

**ឆ្នាំវក** រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះ សុទ្ធតែផ្តល់នូវអត្ថប្រយោជន៍គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នាបើនៅឆ្ងាយ ៕

**ឆ្នាំរកា** ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

**ឆ្នាំច** រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នាជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសម្រេចដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

**ឆ្នាំកុរ** លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

# ខ្មែរអ្នកជាតិនិយម

**តពីលេខមុន**

ប្រទេសបារាំងតែក្នុងរយៈពេលពីរបីថ្ងៃប៉ុណ្ណោះ ជាហេតុឱ្យសាធារណរដ្ឋទី៣ នៃប្រទេសបារាំងរលំបះជើងភ្លាម ហើយសេនាប្រមុខប៉េតាំង ក៏បានចុះហត្ថលេខាសុំចុះចាញ់អាល្លឺម៉ង់នៅថ្ងៃទី ១៦ ខែមិថុនា ឆ្នាំ១៩៤០ ។ នៅពេលនោះហើយ ដែលលោក សឺន ង៉ុកថាន់ និងក្រុមរបស់លោកកើតកង្វល់ព្រួយបារម្ភជាខ្លាំង ចំពោះវាសនាអនាគតរបស់ប្រទេសខ្មែរ ហើយលែងមានការទុកចិត្តសទៅលើបារាំងជាអាណាព្យាបាលទៀតហើយ ។ ដូច្នេះខ្លួនលោកព្រមទាំងសហការីជិតស្និទ្ធពីររូបទៀតគឺ លោក ប៉ាច ឈឺន និងលោក ស៊ឹម វ៉ា បាននាំគ្នាទៅជួបរ៉េស៊ីដង់ត៍ស៊ុប៉េរីយើរបារាំង ទីបូដូ ដោយសម្ងាត់ ដើម្បីសម្ដែងនូវក្ដីព្រួយបារម្ភ និងនូវគោលជំហររបស់ក្រុមលោកថា បារាំងអស់មានសមត្ថភាពការពារព្យាបាលប្រទេសកម្ពុជាតទៅទៀតហើយ បារាំងត្រូវតែប្រញាប់ប្រគល់ទឹកដីខ្មែរមកឱ្យខ្មែរកាន់កាប់ខ្លួនឯងវិញ ។ សេចក្ដីស្នើនេះ បានប្រព្រឹត្តិទៅដោយអហឹង្សា និងសមហេតុផលដែលលោក សឺន ង៉ុកថាន់ បានបញ្ជាក់ថា ខ្លួនលោកនឹងក្រុមរបស់លោកនៅតែចូលចិត្តបានរាំងជានិច្ច ។


និពន្ធដោយ ឡឹក សំអឿន ហៅ "ផ្កាយព្រឹក"

បន្ទាប់ពីសាធារណរដ្ឋទី៣ របស់បារាំងបានរលំរលាយទៅបារាំងចោលម្សៀតបានប្រគល់ទឹកដីខ្មែរមួយចំនួនទៅឱ្យសៀមតាមសន្ធិសញ្ញាបារាំង - សៀមឆ្នាំ១៩០៧ ។ ពេលនោះឯងដែលលោក សឺន ង៉ុកថាន់ និងក្រុមរបស់លោកអស់មានទុកចិត្តរលីងទៅលើបារាំងបរោចោរអប្បល័ក្ខណ៍រួចបាននាំគ្នាបង្កើតក្រុមនយោបាយសកម្មមួយចំពេលដែលស្ដេចក្មេងនរោត្តម សីហនុ ឡើងសោយរាជ្យបន្តពីស្ដេចមុនីវង្ស ដែលនឹងធ្វើពិធីរាជភិសេកនៅថ្ងៃទី៣១ តុលា ឆ្នាំ១៩៤១ ក្រោមអធិបតីភាពនៃអគ្គទេសាភិបាលបារាំង ដឺគូ ។ នៅពេលដែលកើតគំនិតចង់បែកចេញពីបារាំងនោះលោក សឺន ង៉ុកថាន់ និងក្រុមរបស់លោកបានសម្រេចចិត្តថា ចាំបាច់ត្រូវដើរតាមមាគ៌ាមួយជាស្វ័យប្រវត្តិ គឺត្រូវតែឃ្លាតចេញពីរាជវាំងបន្តិចៗម្ដង ពីព្រោះស្ដេចក្មេងថ្មីកំពុងជាប់នៅក្នុងទ្រង់ដែករបស់បារាំងពុំអាចមានឱកាសរើខ្លួនរួចឡើយ ។ ប៉ុន្ដែទោះជាដូច្នោះក៏ដោយគេបានឃើញថា ចាប់តាំងពីឆ្នាំ១៩៤០ រហូតដល់ឆ្នាំ១៩៤៥ ទាំងក្រុមរាជវាំងទាំងក្រុមរាជានិយមនៅតែមានសាមគ្គីធ្វើកិច្ចការរួមគ្នាដដែលគ្រាន់តែចែកមុខនាទីគ្នាធ្វើការតែប៉ុណ្ណោះ ។ ក្រុមរាជវាំងធ្វើការប្រឆាំង និងបារាំងដោយលាក់មុខដោយមានលោក ស៊ឹម វ៉ា មហាក្សត្រីយានីកុសុមៈ និងលោក ប៊ូ ហ៊ីង ជា មេដឹកនាំ ។ ឯក្រុមអ្នកជាតិនិយមមានលោក សឺន ង៉ុកថាន់ ជាមេក្លោងប្រឆាំង និងបារាំងយ៉ាងចេញមុខ ។

នៅពេលដែលសង្គ្រាមលោកលើកទី២ (១៩៣៩ -១៩៤៥) កំពុងឆេះឆាបនោះ គេសង្កេតឃើញកាសែតនគរវត្តឆ្លៀតឱកាសចាប់ផ្ដើមលួចក្ដិច និងខាំអំណាចអាណានិគមនិយមបារាំងកាន់តែខ្លាំងៗឡើងជាលំដាប់ព្រមតាំងខំប្រឹងបំភ្លឺសមតិញសាធារណជនខ្មែរឱ្យកាន់តែភ្ញាក់រលឹក និងឱ្យចេញមុខតស៊ូដណ្ដើមយកសិទ្ធិសេរីភាពរបស់ខ្លួនពីបារាំងមកវិញ ដោយឥតមានញញើត ។ នៅឆ្នាំ១៩៤២ លោក សឺន ង៉ុកថាន់ និងក្រុមរបស់លោកបានសម្រេចចិត្តជាឯកឆ្ន័ន្ទថា កាសែតនគរវត្តតែមួយមិនគ្រប់គ្រាន់ទេ ត្រូវតែបង្កើតកម្លាំងនយោបាយសកម្មចេញមុខឱ្យកាន់តែខ្លាំងថែមទៀត ដើម្បីបំបះបំបោរមហាជនខ្មែរឱ្យស្ទុះក្រោកឡើងប្រឆាំងនឹងអាណានិគមបារាំងយ៉ាងអង់អាច ព្រោះថាខ្មែរជាម្ចាស់ស្រុកតែខ្មែរខ្ញុំគេ ។

កាសែតនគរវត្តបានចុះផ្សាយនូវអត្ថបទជាច្រើន ឧៈ "យើងជាខ្មែរជាម្ចាស់ទឹកដីខ្មែរយើងត្រូវតែមានសិទ្ធិសេរីភាពចាត់ចែងរៀបចំគ្រប់គ្រងប្រទេសជាតិមាតុភូមិរបស់យើង តាមគោលគំនិតនិតទិសដៅរបស់យើង ។ ប្រទេសយើងធ្លាប់ជាមហាអំណាចមួយដ៏ឆ្នើមក្នុងទ្វីបអាស៊ីនាសម័យមហានគរ ព្រោះយើងធ្លាប់មានមហាក្សត្រប្រព្រឹត្តទសពិធរាជធម៌ដឹកនាំប្រជារាស្ត្រទៅកាន់សេចក្ដីចម្រើនរុងរឿងត្រចះត្រចង់ ។ ឥឡូវនេះយើងបានភ្លាត់ស្នៀតធ្លាក់ខ្លួនទៅជាខ្ញុំកញ្ជះគេ ព្រោះយើងចាក់កាប់សម្លាប់ជាតិឯង ព្រោះយើងមិនយល់មិនស្គាល់ជាតិមាតុភូមិជាអ្វី. មិនស្គាល់សិទ្ធិសេរីភាព និងមិនដឹងករណីកិច្ចរបស់យើងជាប្រជាពលរដ្ឋ ។ល។ យើងបណ្ដោយឱ្យវាសនាប្រទេសយើងធ្លាក់ចុះក្នុងកណ្ដាប់ដៃជនបរទេស បណ្ដោយឱ្យគេដឹកច្រមុះដូចគោក្របី ហើយបែរជាសាសន៍ល្ងង់ខ្លៅថោកទាបជាមនុស្សចោរម្សៀតស្លាប់គំនិតចូលចិត្តពឹងលើអ្នកដ៏ទៃ ។ល។ ម្យ៉ាងទៀតទឹកដីប្រទេសជាតិយើងដែលសម្រាប់ឱ្យយើងរស់នៅបានយ៉ាងវិសេសវិសាល ប៉ុន្តែជាតិយើងក្រីក្ររហេមរហាមបាត់បង់ទឹកដីហិនហោចគេរអាគរធនធាន ខ្វះសាលារៀន ខ្វះមន្ទីរពេទ្យ ខ្វះផ្លូវថ្នល់គមនាគមន៍អត់បាយក្រហាយទឹក ហើយសូម្បីតែផ្ទះសម្បែងក៏តាករខាកដែរ ។ **តទៅលេខក្រោយ**

# អ្នកក្រ និង អ្នកមាននៅប្រទេសខ្មែរភាគទី ១៣


គីម សុស មន្ត្រីចូលនិវត្ត ក្រសួងការបរទេស សហរដ្ឋអាមេរិក

**គីម សុស**

ប្រសទ្ធិភាពនៃការស្តាប់តាមការសង្កេតនៅប្រទេសណា ក៏ដូចប្រទេសណាដែរ រឿងអ្នកមានមើលងាយអ្នកក្រ និងអ្នកក្រស្អប់អ្នកមានជាបញ្ហាស្មុគស្មាញ។ ហើយបញ្ហានេះភាគច្រើនមកអំពីរឿងមិនយល់គ្នា។ រឿងមិនយល់គ្នានេះ មកពីមិនស្តាប់គ្នា ឬស្តាប់គ្នាមិនបាន។

## មូលហេតុដែលទាក់ទងនឹងការស្តាប់

...សំដីគាត់អាក្រក់ពេក ខ្ញុំស្តាប់មិនចូល។

...ខ្ញុំមិនចេះស្តាប់ទេ កាលណាគាត់មានប្រសាសន៍ឡើង គាត់ជេរគេជេរឯង។

...ឱ្យខ្ញុំស្តាប់អាមនុស្សបាតផ្សារនោះម៉េចនឹងកើត?

...កុំទៅស្តាប់ពួកអាចោរព្រៃទាំងនោះ។

...គាត់មានប្រសាសន៍ញាប់ពេកខ្ញុំស្តាប់មិនទាន់។

...គាត់មានប្រសាសន៍យូរពេក ធ្វើឱ្យខ្ញុំធុញខ្ញុំស្តាប់បានតែបួនប្រាំមីនុតដំបូងប៉ុណ្ណោះទេ។

...ខ្ញុំអស់កំលាំងពេកខ្ញុំស្តាប់គាត់មិនបានទេ។

...គាត់មិនទាំងគោរពពាក្យសំដីគាត់ផងឱ្យគេស្តាប់គាត់ម៉េចនឹងកើត?

...ពួកវាត្រូវតែស្តាប់អញ ព្រោះអញឱ្យវារស់។

...កូនអើយស្តាប់គេទៅកុំឱ្យគេសម្លាប់កូនឯង។

...ខ្ញុំស្តាប់គាត់ ពីព្រោះគាត់មានប្រសាសន៍នោះវាត្រូវ។

...ខ្ញុំស្តាប់គាត់ ព្រោះខ្ញុំខ្លាចស្លាប់។

មានមូលហេតុច្រើនទៀតដែលរំខានមិនឱ្យមានការស្តាប់។

## ការស្តាប់ជាគន្លឹះទៅដល់ការយល់

ត្រូវចេះស្តាប់។ ត្រូវរៀនស្តាប់។ ត្រូវចេះនិយាយឱ្យគេស្តាប់បាន ។ល ។ស្តាប់មិនបានមិនយល់។ ដូច្នេះមុនទៅដល់ការយល់ ត្រូវស្តាប់។

## អ្វីដែលនាំមកនូវការស្តាប់

តាមការសង្កេតការទាញអារម្មណ៍ដោយសន្តិវិធីនិងការទាញអារម្មណ៍ដោយហិង្សាជាដើមនាំឱ្យមានការស្តាប់។

## ការទាញអារម្មណ៍ដោយសន្តិវិធី

អ្វីដែលនាំឱ្យមានការចាប់អារម្មណ៍ដោយសន្តិវិធីនោះគឺដូចជាភ្លេងពិរោះ សំដីល្អ អ្នកធំដែលគេគោរព អ្នកមានដែលគេគោរព អ្នកចេះដឹងដែលគេគោរពនិងអ្នកទៀងត្រង់និយាយដឹងខុសដឹងត្រូវជាដើម។

## ការទាញអារម្មណ៍ដោយហិង្សា

ចំពោះអ្វីនាំឱ្យមានការកន្ត្រាក់អារម្មណ៍ដោយហិង្សានោះវិញ គឺដូចជាការគំរាមកំហែងប្រើអំណាចផ្តាច់ការការកៀបសង្កត់ និងអំពើភេរវៈកម្មនិងអត្តឃាតជាដើម។

## ផ្លូវទៅអារម្មណ៍

បើតាមយើងនិយាយមកដល់នេះ មុនទៅដល់ការស្តាប់ត្រូវឆ្លងកាត់តាមអារម្មណ៍។ ហើយបើតាមការសង្កេតមានផ្លូវទាំងអស់៦ដែលអ្វីៗអាចចូលទៅទាញអារម្មណ៍បាន។ ផ្លូវទាំង៦នេះដែលហៅថាវិញ្ញាណនោះ គឺចក្ខុវិញ្ញាណ (ភ្នែកសិងហត) សោតវិញ្ញាណ (ត្រចៀក Hearing) ឃានវិញ្ញាណ(ច្រមុះsmell)ជិវ្ហាវិញ្ញាណ (អណ្តាត taste) កាយវិញ្ញាណ(ខ្លួន touch ) និងសភាវគវិញ្ញាណ(សភាវគិនstinct)។

## អ្នកនៅក្រោមទិសដៅនៃការតាមដាន

សូមរំលឹកថា មនុស្សភាគច្រើនយកចិត្តទុកដាក់តាមមើលតាមសង្កេតអ្នកមាន កូនអ្នកមាន អ្នកមានអំណាច និងកូនអ្នកមានអំណាចជាដើម។ កាលណាធ្វើល្អ ឬកាលណាធ្វើអាក្រក់គេដឹង អ្នកកាសែតដឹង។ កាលណាដឹងហើយ គេនិយាយពីអ្វីៗដែលគេដឹងនោះតៗគ្នាពីមាត់មួយទៅមាត់មួយ។ ហើយជាធម្មតាមនុស្សភាគច្រើនមិនសូវចូលចិត្តនិយាយអំពីរឿងល្អពីគ្នាទេ។ ផ្ទុយទៅវិញ ចូលចិត្តនិយាយអាក្រក់ពីគ្នាទៅវិញទៅមក។ ដូច្នេះអ្នកមាន អ្នកមានអំណាច មានការទទួលខុសត្រូវច្រើន គឺត្រូវខំប្រឹងធ្វើល្អ ធ្វើឱ្យល្អ និងខំប្រឹងធ្វើកុំឱ្យខុស។ ព្រោះថា អ្នកមាន និងអ្នកមានអំណាចជាទិសដៅនៃការយកចិត្តទុកដាក់តាមដានមើលពិនិត្យសង្កេត ហើយនឹងជាអ្នកទទួលខុសត្រច្រើនជាងអ្នកឯទៀតក្នុងការដឹកនាំប្រទេសឱ្យបានចម្រើនលូតលាស់។

## ករណីកិច្ចនៃអ្នកមាន

នៅស្រុកខ្មែរ អ្នកមានកាន់តែមានឡើងមានឡើង ហើយអ្នកក្រកាន់តែក្រទៅ ក្រទៅ។ ចរន្តនេះចង្អុលឱ្យយើងគិតថា ស្រុកខ្មែរកំពុងធ្វើដំណើរទៅរកបញ្ហាដែលអាចធ្លាក់ទៅក្នុងសង្គ្រាមដែលអាចធ្លាក់ទៅដល់មានការវិលត្រឡប់ទៅរបបខ្មែរក្រហមវិញ ។ ដូច្នេះអ្នកមានត្រូវគិតថា ខ្លួនជាអ្នកដឹកនាំជាអ្នកអាចធ្វើឱ្យស្រុកចម្រុងចម្រើនទៅមុខ។ អ្នកមានមានសមត្ថភាព និងសម្បត្តិទ្រព្យគ្រប់គ្រាន់នឹងធ្វើទាំងអស់នោះបាន។ ដូច្នេះអ្នកមានត្រូវតែធ្វើពលិកម្មផ្តើមជាអ្នកដឹកនាំឱ្យមានការយល់គ្នារវាងអ្នកក្រនឹងអ្នកមាន។ ត្រង់នេះមានន័យថា ត្រូវរកមធ្យោបាយប្រសិទ្ធភាពធ្វើឱ្យមានការស្តាប់គ្នាទៅវិញទៅមក។ និយាយឱ្យចំ អ្នកមានត្រូវចាប់ផ្តើមនិយាយដោយមានសេចក្តីគោរពទៅកាន់អ្នកក្រមុន គឺមិនត្រូវចាំអ្នកក្រនិយាយមករកខ្លួនមុនទេ។

នៅពេលដែលស្រុកកំពុងតែទោរទៅទោរទៅនេះ អ្នកមានត្រូវចេញមុខមកជួបអ្នកក្រដើម្បីបង្កើនការទាក់ទងរវាងគ្នានឹងគ្នា។ នេះមានន័យថា បង្កើនការចេះស្តាប់គ្នាទៅវិញទៅមក។

## យុទ្ធសាស្ត្របណ្តើមការគោរពបានដោយជោគជ័យ

នៅក្នុងស្ថានការណ៍ទូទៅយើងដឹងហើយថា អ្នកមានមើលងាយអ្នកក្រ ហើយអ្នកក្រស្អប់អ្នកមាន។ តែដើម្បីនឹងជួយស្រុក អ្នកមានត្រូវតែធ្វើពលិកម្មបំភ្លេចវប្បធម៌ទំនៀមទម្លាប់ដែលប្រដៅឱ្យអ្នកតូចត្រូវគោរពអ្នកធំមុនក្មេងត្រូវ

តទៅទំព័រទី ២៦

# ទឹកធ្លាក់តាតៃ រមណីយដ្ឋានដ៏ស្រស់ត្រកាល











នៅពេលលោកអ្នកបានស្តាប់បទចម្រៀងដែលមានចំណងជើងថា "សម្រស់រមណីយដ្ឋានតាតៃ"របស់អ្នកចម្រៀងស្រគត់ស្រគុំកញ្ញា ស៊ិន ស្រីពេជ្រ នោះលោកអ្នកប្រាកដជានឹកមមៃលង់ក្នុងមនោសញ្ចេតនាអណ្តែតត្រសែត និងចង់ស្គាល់ថា តើតំបន់ទឹកធ្លាក់តាតៃ ពិតជាមានទេសភាពឆើតឆាយដូចជាការបកស្រាយនៅក្នុងបទចម្រៀងមែន ឬយ៉ាងណា?

អ្នកទេសចរដែលនិយមចូលចិត្តទៅលេងនៅតាមតំបន់ទឹកធ្លាក់ធម្មជាតិនោះពោលគឺតែងតែនឹកឃើញដល់



ក្នុងផ្ទៃអាងលាន់ឮសូរខ្ទរ បែកពពុះ សក្បុសត្រដុះនឹងផ្ទាំងថ្មលម្អដោយធម្មជាតិចម្រុះឆ្នូតរំលេចចេញ

ឆាយទឹកជ្រោះ ព្រោះជាតំបន់តភ្ជាប់ទឹកសាបនិងទឹកប្រៃចៃដន្យពេលនោះក៏មានបាតុភូតធម្មជាតិខ្យល់ព្យុះភ្លៀងខ្លាំងបណ្តាលឱ្យក្មេងម្នាក់ជាកូនរបស់គាត់បាត់ខ្លួននៅទីនោះ។ លុះក្រោយមកអស់រយៈពេល៤ទៅ៥ថ្ងៃ គេក៏រកឃើញក្មេងនោះនៅកន្លែងដដែលគាត់ក៏សួរនាំកូនគាត់ ហើយក្មេងនោះក៏ឆ្លើយថា មានមនុស្សម្នាក់បាននាំគេទៅដល់កន្លែងមួយពេលនោះមនុស្សនោះបានក្លាយទៅជាខ្មោច





រាល់ទិដ្ឋភាពធម្មជាតិដែលមាននៅទឹកធ្លាក់តាតៃពីមួយថ្ងៃទៅមួយថ្ងៃបាននឹងកំពុងតែទាក់ទាញនូវកំណើនភ្ញៀវទេសចរយ៉ាងខ្លាំងឱ្យមកទស្សនា។ អ្វីដែលមាននៅទីនេះ គឺប្រៀបបានទៅនឹងឋានសួគ៌ធម្មជាតិនៅពេលបានមកដល់ហើយធ្វើឱ្យអារម្មណ៍របស់យើងនឹងរំភើបមួយរំពេច។ តំបន់ទឹកធ្លាក់តាតៃបានក្លាយជាតំបន់រមណីយដ្ឋានធម្មជាតិ និងកែច្នៃគំរូមួយរបស់ខេត្តកោះកុង ។

រមណីយដ្ឋានធម្មជាតិសហគមន៍តាតៃជាក់ជាមិនខាន ព្រោះនៅទីនោះ គឺជាកន្លែងកម្សាន្តមួយប្រកបទៅដោយផ្ទាំងទស្សនីយភាពដ៏អស្ចារ្យ និងមានប្រភពទឹកថ្លាត្រជាក់ធ្លាក់មិនចេះរីងស្ងួត។ នៅជុំវិញទឹកធ្លាក់តាតៃនេះដែរគេឃើញមានហែហមអមទៅដោយព្រៃធម្មជាតិមានដើមរុក្ខជាតិទឹកតូចធំដុះបែកមែកសាខាដែលទាំងនេះជាចំណីចក្ខុសម្រាប់ក្រុមអ្នកទេសចរ។ ចំណែកឯនៅឯមាត់ជ្រោះវិញមានជម្រាលថ្មដាធំទូលាយក្នុងការអង្គុយកម្សាន្តស្តាប់សូរទឹកធ្លាក់ចូលទៅ



ជាទេសភាពពណ៌បៃតងអន្ទងចិត្តអ្នកទេសចរ។

តាតៃមានឈ្មោះថា "ទឹកជ្រោះតាឥសី" ដែលមានរឿងនិទានតំណាលតៗគ្នាថា មានបុរសម្នាក់ឈ្មោះតាតៃបានទៅរកចាប់ត្រីនៅមុំក្បាល

ព្រាយបិសាចចង់សម្លាប់រូបខ្ញុំ ពេលនោះក៏ស្រាប់តែមានមនុស្សម្នាក់ដូចជាតាឥសីលេចចេញមកជួយខ្ញុំ ហើយក៏បាននាំខ្ញុំត្រឡប់មកវិញ។ នៅពេលនោះឳពុកម្តាយក្មេងមានជំនឿថា មានអ្នកសច្ចំ ឬតាឥសីមកជួយសង្គ្រោះកូនគាត់ និងក្រោយមកក្បាលឆាយទឹកជ្រោះនេះ ក៏បានក្លាយជាឈ្មោះជ្រោះឥសី ឬជ្រោះតាតៃជារៀងរហូតមកដល់សព្វថ្ងៃនេះ៕